# KhmerPost USA

សុបិន : (267) 253-3947, សែម : (781) 244-0522

VOL. 06 ISSUE 103 Mar. 23th - April .5th, 2012


មាតិការឿង | ទំព័រ



វិចារណកថា

# គ្រួសារខ្មែរក្រោក ឈរដោយខ្លួនឯង



**ដោយ: ពិន សំខុន**

**ហ្វីឡាដែលហ្វៀ:** ដំណឹងគួរឱ្យភ្ញាក់ផ្អើលមួយ ដែលផ្សព្វផ្សាយថា គ្រួសារខ្មែរផ្ដើមលើកដំបូង បង្អស់បង្ហាញខ្លួនធ្វើបុណ្យផ្ការកធនធានបំរើសហគមន៍ខ្លួនឯង ។ គ្រួសារខ្មែរនៅហ្វីឡាដែលហ្វៀមិនខុសគ្នាពីទីក្រុងសំខាន់ៗ ដែលមានខ្មែរចំនួនច្រើនរស់នៅ ធ្លាប់តែរងគ្រោះដោយគ្មានជំនួយគ្រប់គ្រាន់ ខ្វះសមត្ថភាព ខ្វះសុខភាព ក្រីក្រជិះជាន់ ភាពគ្រោះថ្នាក់នៅជាប់ នឹងកែងជើងតាំងពីក្នុងផ្ទះរហូតដល់ជុំវិញរបងភូមិ មិនដែលហ៊ានមូលមាត់គ្នារកកម្លាំងរួម មកជួយខ្លួនឯងម្ដងណាទេ ។ ហេតុអ្វីក៏មានព្រឹត្តការណ៍ចម្លែកនោះកើតឡើងបាន? ។

សហគមន៍ចិន ឬជប៉ុនមកដល់ទឹកដីថ្មីនៃ ស.រ.អា នេះជាង១៥០ឆ្នាំហើយ ក៏មានពេលមួយនោះក៏គេបានទឹកទៅដល់ការរួមកម្លាំងសហគមន៍ខ្លួនឯង រកធនធានមកជួយលើកតម្កើងគាំទ្រខ្លួនឯងដែរ ទើបបានមកដល់តំណាក់កាលជាសហគមន៍វិជ្ជមាននាថ្ងៃនេះបាន ។ រីឯសហគមន៍ខ្មែរ និងអាស៊ីអាគ្នេយ៍ទើបមកដល់ប្រមាណ៣០ឆ្នាំកំពុងពេញអស់សង្ឃឹម រៀបចំជីវិតមិនទាន់មានលំនឹង ទម្លាក់កំហុសទៅលើអ្នកដទៃ ភាពមានទំនាស់ផ្ទុះឡើងគ្រប់ទិសទី ។ ស្រាប់តែដំណឹងល្អនិយាយពីភាពចុះសម្រុងគ្នា ចេញពីចង្កោមគ្រួសារ បានផុសឡើងដូចជាចៃដន្យ ដើម្បីរៃអង្គាសរកប្រាក់មកកសាងគ្រួសារខ្មែរឱ្យបានប្រសើរនាថ្ងៃនេះ ប្រាកដជារឿងចម្លែកមិនធ្លាប់មានពីមុនមកមែន ។

**តើពីមុនមកវាយ៉ាងម៉េច?**

ផ្ទះសម្បែង ច្រើនមានឈ្មោះត្រឹមជម្រក (Guetto) នៅផ្លូវចង្អៀត មិនសូវមានការសំអាត គ្មានគោមភ្លើងបំភ្លឺពេលយប់ព្រលប់ ភូមិករបានក្លាយទៅជាលានប្រយុទ្ធនៃពួក"គ្នេន"មានខ្មែរ មានក្រុមស្បែកខ្មៅ មានយួន មានស្ប៉ានីស មានលាវ -ថែមពីលើនេះទៅទៀត

តទៅទំព័រទី០២

# អ្នកនយោបាយអាមេរិកចូល ជាសមាជិកសាខាបក្សសិទ្ធិមនុស្ស

**ដោយ : អ៊ុម លឿម**

**ហ្វីឡាដែលហ្វៀ :** ទោះជាស្ថានភាពសេដ្ឋកិច្ចគ្រួសារហាក់ពុំសូវធំធាត់យ៉ាងណាក្តី តែសម្រាប់អ្នកគាំទ្រគណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋផែនស៊ីវេនៀរ៉ (PA) នៃទីក្រុងហ្វីឡាដែលហ្វៀហាក់មិនរុញរាឡើយ ក្នុងការបន្តជួយឧត្ដម្ភដល់ស្នូលគណបក្សរបស់ខ្លួននៅឯទីក្រុងភ្នំពេញនៃប្រទេសកម្ពុជា

តទៅទំព័រទី០៤


សមាជិកជាន់ខ្ពស់គណបក្សសិទ្ធិមនុស្សប្រចាំសហរដ្ឋអាមេរិក

តមកពីទំព័រទី ១

# គ្រួសារខ្មែររក្រោកឈររដោយ...


អ្នកស្រី សុស៊ីមន ចាប ប្រធានសមាគមគាំទ្រគ្រួសារខ្មែរ

មានក្រុមអ្នកធ្វើពាណិជ្ជកម្មឧក្រិដ្ឋ ស្រា-កញ្ឆា -អាភៀន យ៉ាងខ្លាត់ខ្លែង -មិនតែប៉ុណ្ណោះមានការលួចប្លន់ អសន្តិសុខជាប្រចាំ សូម្បីតែកូនចៅខ្លួនឯងខ្លះក៏អាចក្លាយជាចោរប្លន់ផ្ទះខ្លួនឯងដែរ ។ នៅស្ទើរតែគ្រប់ផ្ទះក្មេងក្មេងរៀនបានប្រសើរតែត្រឹមកំរិតថ្នាក់ទី៦-៧ បន្ទាប់ពីនោះទៅ ពួកគេចាប់ផ្តើមមានបញ្ហាជាមួយឪពុកម្តាយ ហើយបញ្ឈប់ការសិក្សានៅវិទ្យាល័យជាបន្តបន្ទាប់ រហូតដល់ "ជម្រក"ទូទៅពុំមានយុវជនឆ្លងផុតទៅកំរិតមហាវិទ្យាល័យទេ ។ គ្មានអ្នកចេះ រកការងារធ្វើមិនបាន ក៏ប្រកបមុខរបរបណ្តោះអាសន្ន មិនអាចធានាអនាគតខ្លួនឯងបានទេ ធ្វើឱ្យអារម្មណ៍មិននឹងនំ កើតជាជម្ងឺប្រចាំកាយ និងជំងឺខួរក្បាលច្រើនគ្នា ដែលនេះបន្ថែមជាទម្ងន់គ្រួសារ និងសហគមន៍ដ៏ធំធេង ។ល។ នៅ១០ឆ្នាំចុងក្រោយដែលវិបត្តិសេដ្ឋកិច្ចនៅស.រ.អា និងនៅពិភពលោកចេះតែធ្ងន់ធ្ងរទៅ សហគមន៍ខ្មែរនៅតែរងគ្រោះដោយ"ជម្រក" នៃអតីតកាលដដែល ហើយថែមទាំងបាត់បង់នូវសម្បត្តិដែលបានសន្សំខ្លះៗហើយថែមទៀត ទាំងនេះបានធ្វើឱ្យខ្មែរក្លាយជាប្រជាជនដែលត្រូវរដ្ឋជួយគាំទ្រ ក្នុងចំនួនច្រើនជាងគេ (មើលតាមតួលេខនៃលទ្ធផលជំរឿនប្រជាជន) ។ នៅក្នុងចំណោមព័ត៌មានឧក្រិដ្ឋកម្ម ក៏មានរឿងខ្មែរជាញយដង ជាអ្នកប្រព្រឹត្តនិងជាអ្នករងគ្រោះដែរ ។

**អ្វីខ្លះដែលកំពុងធ្វើឱ្យផ្លាស់ប្តូរក្នុងសហគមន៍ខ្មែរ?**

ចាប់តាំងពីស.រ.អាផ្តើមបន្ទឹងដៃក្តៅលើចលនា "គ្លេង"កាលពីជាង១៥ឆ្នាំមុនមក ភាពសុខសប្បាយបានកើតឡើងប្រសើរជាងមុន នៅតាមផ្លូវសាធារណរហូតដល់ក្នុងផ្ទះនីមួយៗ ។ កម្មវិធីសម្រាប់ជួយដល់គ្រួសារ និងជួយដល់ការសិក្សាបានបង្កើតឡើងថ្មីៗ អង្រួនឱ្យគ្រប់គ្រួសារទាំងខ្មែរ ទាំងអាមេរិកាំងខ្មៅ ទាំងស្បាញ៉ុលទាំងយួន ឬទាំងលាវ មើលឃើញថា មានការយកចិត្តទុកដាក់ពិតប្រាកដដល់សហគមន៍ និងគ្រួសារពីអ្នកនយោបាយ -នៅ៥ឆ្នាំចុងក្រោយនេះ"សមាគមខ្មែរ"បានបង្កើនចំនួនសកម្មភាពទៅរកគ្រួសារ ធ្វើការដល់ជម្រៅចិត្ត ធ្វើឱ្យពលរដ្ឋចេញមកសម្តែងឆន្ទៈ ទទួលការពន្យល់និង ទទួលសេវាបានច្រើន គួរជាទីគាប់ចិត្ត ។ សមាគមឬអង្គការអាមេរិកាំងជាច្រើនទៀត បានជ្រើសរើសបុគ្គលិកខ្មែរឱ្យទៅបំរើសេវាដែលយកជាធនធានជូនដល់គ្រួសារខ្មែរ ដោយមិនពិបាកយល់ដូចពេលមុនៗ ។ បន្ថែមពីលើនេះ មានសារព័ត៌មានជាភាសាខ្មែរមួយដែរ ដែលជួយផ្តល់ព័ត៌មាន ជួយផ្តល់ចំណេះដឹងដែលត្រូវការ ជូនជាប្រយោជន៍ដល់គ្រួសារខ្មែរជាប្រចាំ ។ ទាំងនេះបង្កើនការចេញមុខជាសាធារណ បង្កើនអំណាចរបស់សហគមន៍ខ្មែរដែលធ្វើឱ្យអាជ្ញាធរចាប់អារម្មណ៍ មកជួយបង្ហាញធនធានឱ្យគ្រួសារខ្មែរ អាចប្រើប្រាស់បានកាន់តែច្រើនឡើង ។


គណៈកម្មាធិការសមាគមរៀបចំធ្វើបុណ្យផ្កា

**"សមាគមគាំទ្រគ្រួសារខ្មែរ" មកពីណា?**

នៅក្នុងចំណោមមាតាបិតាអាណាព្យាបាលខ្មែរ ដែលទទួលសេវាពីអ្នកឯកទេស មានមាតាបិតាមួយក្រុម នៅក្នុងចលនាកម្មវិធី"ភីក"របស់សមាគម សុខភាពផ្លូវចិត្តអាមេរិកាំងមួយឈ្មោះ MHASP (Mental Health Association of Southestern Pensyvania) បានបណ្តុះបណ្តាល ហើយគាំទ្រគ្រួសារឱ្យមានអំណាចចេះប្រើចំណេះយកទៅគ្រប់គ្រងគ្រួសារខ្លួន ដែលកំពុងមានវិបត្តិបាន ។ ក្នុងរយៈ៤-៥ឆ្នាំ ចុងក្រោយនេះ មេគ្រួសារជាច្រើនបានក្លាយទៅជាសមាជិក"គាំទ្រគ្រួសារខ្មែរ" តាមរយៈកម្មវិធី"ភីក"ក៏ចេះតែរីកធំជារៀងរាល់ខែ ។ នៅរៀងរាល់១ខែម្តងយ៉ាងតិច ក្រុមគ្រួសារ "ភីក"តែងតែជួបជុំគ្នាដោះស្រាយបញ្ហាជាវិបត្តិនៅក្នុងគ្រួសារ ដោយពឹងផ្អែកយោបល់នៃអ្នកឯកទេសមកជាដំណោះស្រាយ បញ្ហាមួយចំនួនបានត្រូវដោះស្រាយ ហើយទទួលផលលទ្ធផលប្រសើរដូចជា : ១-យុវជនពីររូបជាមិត្តនឹងគ្នា បោះបង់សាលារៀន២ឆ្នាំដូចគ្នា យើងបានណែនាំទៅដាក់សាលារៀនវិញបាន -យុវជនម្នាក់បានត្រូវឪពុកម្តាយ និងគ្រូបង្រៀនគាំទ្រពេញទំហឹងនិងយុវជនម្នាក់ទៀត ឪពុកម្តាយផ្តុកផ្តាក់ឱ្យតែគ្រូគ្រប់គ្រង

តទៅទំព័រទី១០





# សួស្តីឆ្នាំថ្មី

Happy Khmer New Year
Year of the Dragon B.E. 2556

April
13
14
15
2012



Food, Fun, Dance & Capital Campaign !

ក្រុមរបាំអង្គរ



All Day Event













Location: Between JJ Boomer & Elks Club (Pawtucket Blvd) www.ckbm.org
For Info, Call Maya 978.501.0106 Sambath Soum 978.729.5566, Sam Meas 781.696.1324

















តមកពីទំព័រទី ១

# អ្នកនយោបាយអាមេរិកចូលជាសមាជិកសាខា...

ក្នុងខណៈដែលក្រុមនេះយល់ថា ជាបក្សមួយដែលអាចរំដោះប្រទេសជាតិឱ្យផុតពីក្រញាំនៃរបបផ្តាច់ការនាពេលបច្ចុប្បន្ននេះ ។

ថ្លែងទៅកាន់ភ្ញៀវកិត្តិយសជាតិ និងអន្តរជាតិប្រមាណជា២០០នាក់ ក្នុងពិធីរាត្រីសមោលស ប្រមូលថវិកាកន្លងមកនេះ .លោក វ៉ា សាម៉ុន ប្រធានសាខា



គណបក្សសិទ្ធិមនុស្សប្រចាំរដ្ឋផ្លែនស៊ីវេនៀរ៍ (PA) បានថ្លែងថា : ក្រុមរបស់លោកពុំមានការរុញរាឡើយក្នុងការជួយឧប-ត្ថម្ភគាំទ្រដល់គណបក្សសិទ្ធិមនុស្ស ហើយប្តេជ្ញានិងបន្តគាំទ្របែបនេះជានិច្ចដ៏រាបណាគណបក្សសិទ្ធិមនុស្សយកជ័យជំនះលើការបោះឆ្នោតជាសកលនាពេលខាងមុខនេះ . ដើម្បីដឹកនាំនាវាកម្ពុជាឆ្ពោះទៅកាន់លទ្ធិប្រជាធិបតេយ្យ និងនិតិរដ្ឋដ៏ពិតប្រាកមួយ ។



លោក សេង សារ៉ន ប្រធានសាខាបក្សប្រចាំភូមិភាគឆ្នេរខាងកើត (East Coast) របស់រដ្ឋអាមេរិក ពុំបានធ្វើអត្ថធិ-ប្បាយជុំវិញបញ្ហានយោបាយប្រទេសជាតិនាឱកាសនេះឡើយ ប៉ុន្តែលោកបានអះអាង អំពីការរីកចំរើនរបស់សាខាបក្សសិទ្ធិមនុស្សក្នុងភូមិភាគឆ្នេរខាងកើត របស់លោកដែលលោកទើបតែបានកាន់តំណែង នេះនាពេលថ្មីៗ ។ លោក សារ៉ន ថ្លែងថា "ពេលនេះគណបក្សសិទ្ធិមនុស្សក្នុងតំបន់មានការអភិវឌ្ឍន៍ទៅមុខដោយនឹកស្មានមិនដល់ ព្រោះដោយការផ្សព្វផ្សាយព័តិមានដល់បណ្តាជនជាតិខ្មែរ ពិសេសដល់អ្នកនយោបាយរបស់អាមេរិកឱ្យពួកគេបានយល់ការណ៍របស់បក្សសិទ្ធិមនុស្ស" ។ ដោយឡែកក្នុងដំណើរឆ្លងដែនមកពីប្រទេសកាណាដា



ភ្ញៀវចាស់ក្មេងមកចូលរួមរីករាយពិធីជប់លៀង

លោក ទូន យក់ដា ប្រធានសាខាបក្សសិទ្ធិមនុស្ស



ប្រចាំទ្វីបអាមេរិក ខាងជើង (អាមេរិកនិងកាណាដា) ក៏បានពន្យល់ដល់អ្នកចូលរួមអំពីគោលបំណងនៃអង្គពិធីដែលប្រារព្ធធ្វើឡើងនាឱកាសនោះ ។ លោក យក់ដា ថ្លែងថា "នេះជាពិធីរៃអង្គាសប្រាកសម្រាប់ជួយដល់បក្សសិទ្ធិមនុស្សនៅឯប្រទេសកម្ពុជាក្នុងផ្គត់ផ្គង់ដល់ពលរដ្ឋក្រីក្រមួយចំនួនដែលកំពុងរស់វេទនា និងពុំមានទឹកស្អាតប្រើប្រាស់នារដូវនោះ..." ។

មានខុសពីថ្នាក់នាំ ឯទៀតឡើយ.លោក កែវ សម្បត្តិ អនុប្រធានគណកម្មការកណ្តាលរបស់គណបក្សសិទ្ធិមនុស្សក៏បានអំពាវនាវឱ្យមានការជ្រោមជ្រែង.ជួលឈឺឆ្អាលចំពោះវាសនាប្រទេសពី



សំណាក់បណ្តាលពលរដ្ឋខ្មែរនៅគ្រប់ច្រកល្ហកទាំងអស់ ។ លោក សម្បត្តិ បន្តថា :"មកទល់ពេលនេះដំណើររបស់គណបក្សសិទ្ធិមនុស្សអាចរស់ គឺដោយអាស្រ័យលើការជួយឧបត្ថម្ភគាំទ្រពីសំណាក់បងប្អូនទាំងអស់គ្នា ហើយចំពោះអ្វីដែលយើងធ្វើនារាត្រីនេះគឺប្រមូលឱ្យជួយគ្រូបង្រៀន និងសម្ភារៈផ្នែកកុំព្យូទ័រ. ភាសាអង់គ្លេស និងខាងមុខវិជ្ជាផ្នែកជាអ្នកដឹកនាំ...." ។

ចំពោះអ្វីដែលជាការកត់សម្គាល់នោះ គឺវត្តមានរបស់ពាណិជ្ជករកំរិតខ្ពស់ជនជាតិអាមេរិក គឺអ្នកស្រី JOANNE BACCARI ប្រធានធនាគា PNC Bank ។ អ្នកស្រីពុំបានលូកលាន់ ចំពោះកិច្ចការនយោបាយរបស់បក្សប្រចាំមួយនេះឡើយ ប៉ុន្តែអ្នកស្រីមានការកោតសរសើរចំពោះរស់ជាតិសម្លរការីខ្មែរ ដែលជាហេតុធ្វើអ្នកស្រីបង្ខំចិត្តខ្ចប់យកទៅផ្ទះខ្លះ! ។

ចំណែកអ្នកកាសែតបរទេសមកពីទស្សនាវដ្តី Row House និងកាសែត PHILDELPHIA PUBLIC RECORD គឺអ្នកស្រី MARIE MER-LINO ក៏បានបង្ហាញនូវភាពស្ងប់ស្ងាត់របស់អ្នកស្រីដោយពុំបានផ្ញើសារអ្វីដល់អ្នកចូលរួមស្តាប់ឡើយ ប៉ុន្តែអ្នកស្រីបានបង្ហាញនូវកាយវិការសប្បាយរីករាយដោយការរាំរែកនូវបទចម្រៀងខ្មែរដោយខុសចង្វាក់ភ្លេង ប៉ុន្តែសម្រាប់តួអង្គសំខាន់ និងជាក្តីសង្ឃឹមថ្មីមួយទៀតសម្រាប់សាខាបក្សសិទ្ធិមនុស្សប្រចាំរដ្ឋផែនស៊ីវេនៀរ៍ (PA)នោះ គឺជាការលាតត្រដាងរបស់លោកស្រី KAREN BROWN ជាបេក្ខភាពចៅហ្វាយក្រុងហ្វីឡាដែលហៀវពុំបានជាប់ឆ្នោត ។ អ្នកស្រី BROWN បានសន្យាថា នឹងធ្វើយ៉ាងណាដើម្បីឱ្យសាខាបក្សសិទ្ធិមនុស្សមួយនេះមានសន្ទុះទៅមុខ ដើម្បីសម្រេចដល់គោលដៅដ៏ពិតប្រាកដមួយ ។ អ្នកស្រីបន្តថា នឹងជម្រុញព្រមទាំងអន្ទងដល់អ្នកវិនិយោគិនទាំងឡាយ ដោយក្នុងនោះរាប់ទាំងតារាភាពយន្តហូលីវូដផងនោះឱ្យពួកគេជួយធ្វើវិភាគទានដល់បក្សសិទ្ធិមនុស្សដើម្បីទាមទារនូវសេរីភាពដ៏ពិតប្រាកមួយជូនពលរដ្ឋដែលកំពុងរស់ក្រោមគំនៀបមួយដែលយើងទទួលយកពុំបាន...។




សេង សារ៉ន រាំកំសាន្តជាមួយអ្នកស្រី ខារ៉ែប្រោន

បើយោងតាមការអះអាងរបស់លោក សេង សារ៉ន ប្រធានប្រចាំឆ្នេរខាងកើតរបស់សហរដ្ឋអាមេរិកបានឱ្យ "ខ្មែរប៉ុស្តិ៍" ដឹងថា បច្ចុប្បន្នអ្នកស្រី KAREN BROWN ក៏ជាសមាជិករបស់គណ-បក្សសិទ្ធិមនុស្សផងដែរ.ដែលអ្នកស្រីមានតួនាទីជាជំនួយការផ្នែកការបរទេសរបស់លោក សេង សារ៉ន ក្នុងការធ្វើទំនាក់ទំនងជាមួយឥស្សរៈជននយោបាយកំពូលៗរបស់អាមេរិក ដើម្បីពន្យល់ឱ្យពួកគេបានយល់ច្បាប់អំពីគោលការណ៍របស់បក្សសិទ្ធិមនុស្សនិងអំពីនិទោនភាពនៅក្នុងប្រទេសកម្ពុជា នាពេលបច្ចុប្បន្ន ។

សូមជម្រាបផងដែរថា រាត្រីសមោលសនេះបានប្រព្រឹតឡើងកាលពីថ្ងៃសៅរ៍ទី១៧ខែកន្លងមកនេះ នៅឯសាលដ៏តូចល្មមរបស់វត្តលាវ ស្ថិតលើដងផ្លូវលេខ២០វ៉ាស៊ីនតោននាទីក្រុងហ្វីឡាដែលហៀវខាងត្បូង ៕

KHMER POST USA, LLC
East Coast Publication

Pin Samkhon,
Publisher & Editor-in-Chief
Email: pinsamkhon@gmail.com
Staff Writers: Loeum Im

Contributed Writers:
Mam Yin, Kim Phien
Advertising Department

Soben Pin
KhmerPostUSA@gmail.com
267-253-3947

Sam Khoeun
Sales Consultant
(781) 244-0522

Design Staffs:
Leang Heng & Mong Meng

KhmerPost USA, LLC is an independent newpaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local, community, and national news; and give an insight into Cambodia & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English.
It published twice a month in Pennsylvanian & Massachusett.

Semimonthly edition subscription is available within the U.S. & Canada at $60.00 and 70 Euros in Europe per year.
Money order or check is accepted and made payable to:
KhmerPost USA, LLC
438 LINDLEY AVE.
Philadelphia, PA 19120

The Khmer Post has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# សហគមន៍ព្រះសង្ឃខ្មែរ ផ្តើមគម្រោងបីឆ្នាំ

**ឡូវែល :** សហគមន៍ព្រះសង្ឃខ្មែរ ដឹកនាំដោយព្រះគ្រូចៅអធិការ សៅ ឃន បានមកតាំងទី នៅទីអារាមថ្មីមួយ ស្ថិតនៅតាមដងទន្លេមេរីម៉ាក ឡូវែល តាំងពីឱកាសចូលវស្សាឆ្នាំ២០១១ លើទីដីដ៏ធំទូលាយ មានតែព្រៃស្រោង និងអាគារតូចមួយ សម្រាប់ជាកុដិព្រះសង្ឃតែប៉ុណ្ណោះ។

តែសហគមន៍ព្រះសង្ឃនេះ មានមហិច្ឆិតាគ្រប់គ្រងចលនាព្រះសង្ឃពុទ្ធសាសនា នៅក្រៅប្រទេសកម្ពុជាផង និងបំណងសាងសង់វត្តអារាមពិសេសមួយឱ្យស្របតាមតួនាទីដ៏កំពូលនេះថែមទៀត ។ ពុទ្ធបរិស័ទដែលធ្លាប់តែគាំទ្រ ព្រះគ្រូសៅ ឃន បានចូលបច្ច័យប្រកបដោយសទ្ធាទូលំទូលាយផង ដោយបុណ្យផ្កាផង បានទិញទីដីដ៏ធំនេះ តាំងជាទីស្នាក់ការរបស់សហគមន៍ព្រះសង្ឃខ្មែរ ប្រគេនព្រះអង្គកាន់កាប់ជាងកន្លះឆ្នាំហើយ រីឯគម្រោងសង់ព្រះវិហារ -សាលា ឬកុដិនានានឹងត្រូវការបច្ច័យប្រមាណ១០ដង លើសថ្លៃដីថែមទៀត ដែលនឹងត្រូវការសទ្ធាជ្រះថ្លាពីបណ្តាសាធារណជនកាន់តែច្រើនថែមទៀត។

លោក សំខាន់ ឃឿន អតីតប្រធានសមាគមខ្មែរ






បច្ចុប្បន្នជាសាស្ត្រាចារ្យ ជាអ្នកឯកទេសដឹកនាំការស្វែងរកថវិកាមកសាងសង់វត្ត បាននិយាយប្រាប់ខ្មែរផូសថា "នេះជាការងារដ៏លំបាក ដែលតម្រូវឱ្យខ្ញុំកំណត់ពេលបីឆ្នាំ សម្រាប់ធ្វើឱ្យសម្រេចការងាររកថវិកានេះ" ដើម្បីឱ្យធ្វើទៅបានលុះត្រាតែផ្តុំកត្តាបីរួមគ្នាជាមុមចង្ក្រាន គឺពឹងផ្អែកទៅលើ**១**-ធម្មខណ្ឌទាំង៨៤០០០ ដែលជាលំនឹងនៃធម៌ព្រះពុទ្ធ **២**-ការពង្រីកអ្នកជឿ ពង្រីកសមាជិក **៣**-សមាជិកដែលបង់វិភាគទានម្នាក់ ១០០ដុល្លារអាមេរិក សម្រាប់ជាវព្រះពុទ្ធរូប ដែលមានឆ្លាក់ឈ្មោះសប្បុរសជនលើនោះ ។ នៅពេលដែល "ខ្មែរផូស" សួរថា "ចំនួនបច្ច័យច្រើនយកទៅធ្វើសមិទ្ធិផលធំ គឺពុំមែនត្រឹមតែសទ្ធារបស់មនុស្សតែប៉ុណ្ណោះទេ គឺជាបច្ចេកទេសទីផ្សារសេរីមួយយ៉ាងប្រាកដ តើខ្ញុំនិយាយនេះត្រូវទេ?" លោក សំខាន់ តបថា "ប្រាកដណាស់ ដែលថាអ្នកទិញនឹងទិញ របស់ដែលគេមានជំនឿជាពាណិជ្ជកម្មបេះដូង ដែលខ្ញុំមានភារៈកិច្ចរៀប បំណងនៃការចង់បង្កើតនោះ ឱ្យក្លាយជាការពិតដែល ពុទ្ធបរិស័ទជឿថា នឹងផ្តល់ជាប្រយោជន៍ដល់សង្គមវិញ នៅពេលសមិទ្ធិនោះបានកើតឡើង"។

អ្វីដែលនឹងកើតឡើងនោះគឺ នៅលើទីដីដ៏ធំទូលាយ មជ្ឈមណ្ឌលសក្ការៈបូជាមួយនឹងត្រូវសាងសង់ដើម្បីបំពេញតួនាទីពីរ: **១**-គឺវត្តខ្មែរ នឹង **២**-សហគមន៍ព្រះសង្ឃខ្មែរ ដែលជាគ្រឹះនៃជំនឿដ៏យូរលង់ នឹងដ៏ជ្រាលជ្រៅរបស់ពូជសាសន៍ខ្មែរ ។ នៅបីឆ្នាំខាងមុខនេះ លោក សំខាន់ ឃឿន នឹងបញ្ចុះបញ្ចូលឱ្យគ្រប់សមាជិកស្នូលរបស់សហគមន៍ព្រះសង្ឃខ្មែរ បង្កើនជំនឿលើព្រលឹងនៃព្រះពុទ្ធសាសនាខ្មែរ ហើយពង្រីកឱ្យបានជ្រួតជ្រាបដល់សហគមន៍ខ្មែរ និងបរទេសឱ្យបានរឹតតែច្រើន ដើម្បីឱ្យក្លាយទៅជាសមាជិកសរសរទ្រូង។ សហគមន៍ខ្មែរប្រមាណ២៨ម៉ឺននាក់ ដែលរស់នៅ ស.រ.អា នេះ បើមានតែ ៥០ភាគរយនៃអ្នកគាំទ្រជាសមាជិកសសទ្រូងគោលដៅនោះនឹងបានសម្រេចហើយ" ។ តួលេខដែលជាគោលដៅនោះ គឺ៨៤០០០ ដែលជាក្បួនតម្រានៃព្រះធម៌ និងក្រិត្យវិន័យជាពុទ្ធសាសនិកចារុនៅ១០០ឆ្នាំ បន្ទាប់ពីព្រះពុទ្ធចូលបរិនិព្វាន ដោយក្រុមជំនុំព្រះសង្ឃដែលបានកត់ត្រាសកម្មភាពផ្សព្វផ្សាយព្រះធម៌របស់ព្រះសម្មាសម្ពុទ្ធ ។ គឺនៅលើតួលេខនោះហើយដែលព្រះពុទ្ធដិមាករពៃនភ្លែនតូចៗកំពស់១២ cm ចំនួន ៨៤០០០អង្គ ធ្វើពី"សេរ៉ាមិច"នឹងត្រូវផលិតឡើង ដោយវិចិត្រករខ្មែរនៅឡូវែល ។ សមាជិកសរសរទ្រូងម្នាក់ៗនឹងចាប់កុសលជាប្រាក់១០០ ដុល្លារអាមេរិក ដើម្បីឱ្យមានឈ្មោះរបស់ខ្លួន លើឆ្លាក់លើបាលង្កព្រះពុទ្ធមួយ ហើយចម្លាក់ព្រះពុទ្ធនោះនឹងត្រូវអភិសេកហើយ ដំកល់ជាសក្ការៈ នៅអាសនៈនា ព្រះវិហាររបស់វត្តខ្មែរនោះ ។ ក្នុងន័យនេះ តួលេខ ៨៤០០០នៃធម្មខណ្ឌ នឹងក្លាយទៅជាថវិកាយ៉ាងហោចណាស់៨លានកន្លះបន្ថែមពីលើថវិកានេះទៀត មានការចូលចាប់កុសលក្នុងការទិញដីប្រមាណ៥ហិចតា ដែលនឹងត្រូវការសទ្ធាមនុស្ស៦០ដុល្លារអាមេរិក ក្នុងមួយម៉ែត្រការ៉េទៀត។

ក្នុងរយៈពេលបីឆ្នាំដែលនឹងផ្តើមពីខែមេសា ឆ្នាំ ២០១២ ដល់ មេសា ២០១៥ លោក សំខាន់ ឃឿន សង្ឃឹមថា នឹងឃើញថវិកាកើនជាលំដាប់ ជាមួយគ្នានឹងការកើនភាពមូលមតិសាមគ្គីគ្នាជុំវិញព្រះពុទ្ធសាសនា ការកើននៃអ្នកដឹកនាំត្រឹមត្រូវ ជាមួយគ្នានឹងការកើនឥទ្ធិពលនៃសហគមន៍ខ្មែរទៀតផង ។ គឺនៅផ្នែកទីពីរនៃការគ្រប់គ្រងនេះ លោកបន្ថែមថា "ដើម្បីជំនឿនឹងទំនុកចិត្តរបស់សាធារណជន គម្រោងផ្តល់ជំនួយស្មារតីចំណេះផ្នែកអំណាចក្រ ក៏ត្រូវរៀបចំនឹងកែរតម្រូវឱ្យស្របតាមការគ្រប់គ្រងសម័យថ្មី ដែលត្រូវការ ការចូលរួម និងតម្លាភាពជាចាំបាច់ផងដែរ"។

**ដោយ : ពិន សំខុន**

# សុនខដែលម្ចាស់វាទុកមរតក១២លានដុល្លារ ពេលនេះបានលាចាកលោកហើយ

សុនខដ៏មានទ្រព្យស្តុកស្តម្ភមួយដែលទទួលមរតក១២លានដុល្លារពីលោកស្រី ឡេអូណា ហេមស្លី (Leona Helmsley) ជាជនជាតិអាមេរិក ដែលមានសណ្ឋាគារជាច្រើននោះ បានអស់ជីវិតហើយ នេះបើយោងតាមអ្នកនាំពាក្យមូលនិធិរបស់សេដ្ឋីនីរកស៊ីខាងសណ្ឋាគារដែលបានទទួលមរណភាពរូបនេះបាននិយាយកាលពីថ្ងៃព្រហស្បតិ៍។

លោកស្រី ហេមស្លី ដែលជាម្ចាស់សាខាទាំងអស់នៃសណ្ឋាគារ Helmsley បានបន្សល់ទុកប្រាក់ ១២លានដុល្លារក្នុងបណ្តាំមរតករបស់លោកស្រីទុកសម្រាប់សុនខជាទីស្រឡាញ់របស់ខ្លួនដែលមានឈ្មោះថា Trouble នេះពេលដែលលោកស្រីបានស្លាប់កាលពីឆ្នាំ២០០៧។

លោកស្រី អេលីន ស៊ូលីវ៉ាន (Eileen Sullivan ) អ្នកនាំពាក្យមូលនិធិសប្បុរសធម៌ហេមស្លី (Helmsley Charitable Trust) និយាយថា Trouble បានស្លាប់កាលពីខែធ្នូ ក្នុងវ័យ១២ឆ្នាំ និងត្រូវ បានបូជាត្រឹមត្រូវ ហើយធាតុរបស់វាត្រូវបានរក្សាទុកជាលក្ខណៈឯកជន។

ប្រាក់នៅក្នុងមូលនិធិសប្បុរសធម៌ទុកសម្រាប់ការមើលថែទាំងវាត្រូវបានផ្ទេរចូលក្នុងមូលនិធិ Leona M. and Harry B. Helmsley Charitable សម្រាប់ប្រើប្រាស់ក្នុងគោលបំណងមនុស្សធម៌វិញ ៕

*ប្រែសម្រួលដោយ តែម សុខុម*

# Cambodia-Linked Investors Sentenced in Seoul

By Simon Lewis
THE CAMBODIA DAILY

The chief executives of the firms behind two large-scale real estate projects in Cambodia have been sentenced to jail in Seoul for obtaining illegal loans and using the money to finance fictitious companies abroad, according to a South Korean court official.

The two executives were among a long list of officials at the Busan Savings Bank that were sentenced last month in South Korean for their involvement in allocating illegal loans and paying government officials to cover it up.

Lee Sang-ho, CEO of World City Co Ltd the firm behind the $2 billion Camko City satellite city in Phnom Penh´s Russei Keo district, which is currently stalled was sentenced to five years in prison on Feb. 21, Cho Won-kyong, information officer at the Seoul Central District Court, said in an email on Wednesday.

The second man **continue page 8**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃព្រហស្បតិ៍ ទី២២ ខែមីនា ឆ្នាំ២០១២

# សាលាដំបូងខេត្តកោះកុងបានចោទប្រកាន់អ្នកបើកបររថយន្តក្រុងដែលបង្កគ្រោះថ្នាក់

**សាំង សុឥន្ទ្រិទ្ធ និង** Simon Lewis
**ខេមបូឌា ដេលី**

នគរបាលបានឱ្យដឹងថា សាលាដំបូងខេត្តកោះកុងកាលពីម្សិលមិញបានចោទប្រកាន់អ្នកបើកបររថយន្តក្រុងម្នាក់ពីបទបើកបរធ្វេសប្រហែសរត់គេចខ្លួនពីកន្លែងកើតហេតុ និងបង្ករបួសស្នាមនៅក្នុងគ្រោះថ្នាក់ក្រឡាប់រថយន្តក្រុងកាលពីថ្ងៃអង្គារ៍ ដែលបណ្តាលឱ្យទេសចរបរទេសពីរនាក់ស្លាប់បាត់បង់ជីវិត និងបណ្តាលឱ្យមនុស្ស៤៥នាក់ផ្សេងទៀតរងរបួស។

លោក អ៊ុក សុខា ប្រធាននគរបាលចរាចរខេត្តកោះកុងបានថ្លែងថា អ្នកបើកបរឈ្មោះ សម សំណាង អាយុ៣៥ឆ្នាំត្រូវបានចាប់ខ្លួននៅក្នុងរាជធានីភ្នំពេញ បន្ទាប់ពីម្ចាស់ក្រុមហ៊ុនផារ៉ាម៉ោនអង្គរ អិចប្រេស្ស (Paramount Angkor Express) បានសហការជាមួយនគរបាលកាលពីថ្ងៃពុធ ក្នុងការចាប់ខ្លួនអ្នកបើកបររូបនេះ។

លោក សុខា បាននិយាយថា អ្នកបើកបរឈ្មោះ សំណាង ត្រូវបាននគរបាលចាប់បញ្ជូនត្រឡប់ទៅខេត្តកោះកុងវិញ ហើយត្រូវបានចោទប្រកាន់លើបទល្មើសចំនួនបីករណីតាមមាត្រា៨១ នៃច្បាប់ចរាចរណ៍។

យោងតាមលោក សុខា បានឱ្យដឹងថា អ្នកបើកបរបានបន្ទោសទៅលើស្ថានភាពផ្លូវចំពោះគ្រោះថ្នាក់ក្រឡាប់រថយន្តនេះហើយបាននិយាយថា រថយន្តបានកិនដុំថ្មមួយដុំស្របពេលដែលរថយន្តកំពុងលឿន។

លោក សួន សាមិត អនុប្រធានមន្ទីរពេទ្យបង្អែកខេត្តបានមានប្រសាសន៍ថា ជនបរទេសដែលបានរងរបួសបីនាក់ទៀតបានចាកចេញពីមន្ទីរពេទ្យខេត្តកោះកុងទៅប្រទេសថៃហើយកាលពីម្សិលមិញ។

លោក សាមិត បានថ្លែងថា ក្មេងស្រីខ្មែរម្នាក់ដែលបានដាច់ដៃនៅក្នុងគ្រោះថ្នាក់ក្រឡាប់រថយន្តនេះកំពុងតែបន្តស្នាក់នៅក្នុងមន្ទីរពេទ្យនៅឡើយ ។ លោកបានបន្ថែមទៀតថា អ្នករងរបួសរូបនេះបានទទួលការព្យាបាលដោយឥតគិតថ្លៃនៅមន្ទីរពេទ្យនេះ។

ជនរងគ្រោះទាំងអស់ត្រូវតែទាមទារសំណងពីក្រុមហ៊ុនធានារ៉ាប់រងជាតិកម្ពុជា (កាំមីនកូ) ដែលជាក្រុមហ៊ុនធានារ៉ាប់រងរបស់ក្រុមហ៊ុន ផារ៉ាម៉ោន។

លោក ណុច សាវិន មន្ត្រីផ្នែកទូទាត់សំណងធានារ៉ាប់រងរបស់ក្រុមហ៊ុនកាំមីនកូបាននិយាយថា "វាជាដំណើរការមួយដ៏យូរក្នុងការបង់ថ្លៃធានារ៉ាប់រងសម្រាប់ពួកគាត់ ពីព្រោះជនរងរបួសមួយចំនួនបានចាកចេញពីប្រទេសកម្ពុជាបាត់ទៅហើយ"។

លោក ហូ វណ្ឌី សហប្រធានក្រុមការងារវិស័យទេសចរណ៍ផ្នែកឯកជន និងរដ្ឋាភិបាលបានមានប្រសាសន៍ថា បើយោងតាមនគរបាលជាតិ គ្រោះថ្នាក់ក្រឡាប់រថយន្តក្រុងដែលតែងតែកើតឡើងជារឿយៗដែលបានសម្លាប់មនុស្ស២៥នាក់នៅកម្ពុជា កាលពីឆ្នាំមុននោះ អាចគំរាមកំហែងដល់ចំណូលពីវិស័យទេសចរណ៍របស់កម្ពុជា។

លោកបានមានប្រសាសន៍ថា "បើសិនជាគ្រោះថ្នាក់ក្រឡាប់រថយន្តចេះ តទៅទំព័រទី ១៦

# Court Charges Driver After Koh Kong Bus Crash

**By Saing Soenthrith And Simon Lewis**
THE CAMBODIA DAILY

The Koh Kong Provincial Court yesterday charged a bus driver with careless driving, fleeing the scene of an accident and causing injury in Tuesday´s fatal crash, which led to the death fo two foreign tourists and the injury of 45 others, police said.

Koh Kong provincial traffic police chief Ouk Sokha said the driver, Sam Samnang, 35, was arrested in Phnom Penh after the bus operator, Paramount Angkor Express Co Ltd, cooperated with police on Wednesday to apprehend him.

Mr. Samnang was returned to Koh Kong and charged under three counts of Article 81, Mr. Sokha said.

The driver blamed the condition of the road for the crash and said he had hit a rock at high speed, according to Mr. Sokha.

The remaining three injured foreign victims left the Koh Kong Provincial Hospital yesterday, traveling to Thailand, the hospital´s deputy chief, Suon Samith, said.

A young Cambodian girl who lost her left arm in the crash remains in the hospital, Mr. Samith said, adding that the injured had received free medical care at the hospital.

The victims must now try to get compensation from the Cambodian National Insurance Company (Caminco), which insures Paramount.

"It´s a long process to pay insurance for them because some of the victims hvae left Cambodia," said Noch Savin, an official in Caminco´s claims department.

The regularity of bus crashes which kill 25 people in Cambodia last year, according to the national police could threathen the country´s tourism revenues, co-president of the Government-Private Sector Tourism Working Group Ho Vandy said.

"If the happens time after time, we will lose the trust of tourisits," he said.

Mr. Vandy said that following the news of the crash Tuesday, the issue of safety for the tour buses was raised at a meeting fo the private-sector working group of tourism at the Cambodian Chamber of Commerce.

"We plan to say [to the government] that the law enforcement should be strengthened to have more safety... for tourists and passengers.

"If they don´t follow and obey the law, they will get punishment."

Minister of Tourism Thong Khon could not be reached for comment.




គីម កៀន



នាងអាំល្បីឈ្មោះខាងជេរ ដាក់បណ្ដាសាគ្មាននរណាមួយមិនស្គាល់ នៅភូមិកណ្ដាលក្រោម ឃុំបន្ទាយដែក ស្រុកគៀនស្វាយ។ យូរៗទៅសឹងតែគ្មានមនុស្សណាហ៊ានដើរកាត់មុខផ្ទះគាត់ ព្រោះខ្លាចគ្រោះកាចត្រូវគាត់ជេររកឆ្លងឆ្លើយមិនឈ្នះគាត់ ហើយត្រូវគាត់ជេរមិនឈប់ មិនឈរទាំងយប់ទាំងថ្ងៃ នាំឱ្យសូយធំ។

ព្រឹកនេះ គាត់ឈរជំទែងមុខផ្ទះសម្លឹងទៅផ្លូវលំ.ដៃទាំងពីរច្រតចង្កេះយ៉ាងសង្ហារ ចំកោងខ្នងស្រែកជេរពួពីក្បាលភូមិដល់ចុងភូមិ: "កូនមេណាវាលួចមាន់អញហ្នាំ មាន់អញកំពុងតែចិកស៊ីស្រូវក្នុងបោយអំបាញ់មិញណឹងសោះ គ្រាន់តែចូលផ្ទះបន្តិចចេញមកវិញវាហ៊ានយកបាត់ភ្លាម។ អាណា.កូនមីចោរណាហ្នាំ? វាហ៊ានលួចមាន់អញ មាន់អញធាត់ឱ្យទ្រឡុកៗវាហ៊ានចាប់យកទៅ។ កូនមីណាកូនអាណាអាក្រក់អីម្លេះលោកអើយ! មាន់ឯងធំធាត់បានប៉ុណ្ណឹងវាមកឆក់យកទៅបាត់ទាំងភ្នែកស្រស់។ កូនមេកើតច្រាស់ជើង អាចោរឡានបុក.ជិះកបាល់ហោះឱ្យកបាល់ហោះធ្លាក់ ជិះកបាល់ឱ្យកបាល់វាលិច. ជិះស៊ីក្លូឱ្យស៊ីក្លូវាក្រឡាប់តែហោង។ អាចោរពោះវែកចិក! ឱ្យចិកទាំងម៉ែទាំងកូនទាំងឪវាកុំឱ្យវាពូកែលួច ឱ្យអាសន្នរោគកាច់កាច់ឱ្យអស់មួយពូជ ឯងកុំឱ្យវាពូកែលួច!"។ នាងអាំអស់កម្លាំងក៏ដើរចូលផ្ទះ ប្ដីធុញទ្រាន់ណាស់ តែមិនអាចឃាត់ប្រពន្ធបានក៏បណ្ដោយឱ្យជេរតាមចិត្ត។ គាត់សម្លឹងមុខប្រពន្ធដោយទឹកមុខស្លូត:"ហ្នឹងស្រែកទឹកហើយយ៉ាង នោះទឹកបងដងមួយកែវស្រេចទុកឱ្យញ៉ាំទៅឱ្យបាត់ស្រេក។ នាងអាំមានទឹកមុខស្មើ:"ចេញទៅជួយជេរបន្តិចមើល. ខ្ញុំសម្រាកបាត់ហត់បន្តិច ចេះនៅស្ងៀមទៅកើត ឯងជេរហត់ស្ទើរដាច់ខ្យល់ទៅហើយ បងនៅដេកគងអន្ទាក់ខ្លាយ៉ាងអៀងអើយ!គ្មានខ្វល់។ នេះបានចំជាប្ដីអាចារ្យមែនតែម្ដង! មើល៍!ចេញទៅជេរជំនួសខ្ញុំបន្តិចមើលខ្ញុំសម្រាកបន្តិច"។ ទ្រាំនៅស្ងៀមតទៅទៀតមិនកើត លោកប្ដីចេញទៅដោយគ្មានបានគិតមុនថាត្រូវជេរថាម៉េច:"អើអាណាលួចមាន់អញ ឯងយកទៅធ្វើអី?ឯងស្ងោរឬស្លម្ជូរ?..."។ ប្រពន្ធស្រែកពីក្នុងផ្ទះទៅដោយក្ដៅក្រហាយ:"ទៅសួរវាធ្វើអីតាបិនេះ វាដែលប្រាប់តាបិឯងហ្នាំ? ជេរដាក់បណ្ដាសាវាទៅណាំ ជេរដូចខ្ញុំជេរអំបាញ់មិញអញ្ចឹងទៅ..."។ "ពួកឯងចាំស្ដាប់អញជេរដូចប្រពន្ធអញជេរ ពួកឯងអញ្ចឹង..."។ "ដាក់បណ្ដាសាវាទៅបង..."។ អញដាក់បណ្ដាសាពួកឯងឱ្យទៅណាជិះកបាល់ៗលិចពេលទៅដល់កន្លែង.ជិះកបាល់ហោះៗឡើងមិនរួច ព្រោះពួកឯងវាធ្ងន់ជាងផែនដី.បើបានឡើងរួចសុំឱ្យទៅចុះដល់ទីកន្លែង។ "ប្រពន្ធមិនពេញចិត្តក៏ស្ទុះចេញទៅក្រៅផ្ទះ :"ជេរស្អីអញ្ចឹង?ឱ្យវាទៅដល់ទីកន្លែងចុះចតយ៉ាងសុខសប្បាយអញ្ចឹង? ដាក់បណ្ដាសាឆ្កួតអីអញ្ចឹង?"។ ប្ដីញញឹមស្លូត:"បងអាណិតអ្នកដំណើរផ្សេងទៀត គ្នាអត់លួចមាន់យើងផង កបាល់ហោះធ្លាក់មិនងាប់គ្នាអស់ដោយអត់បានលួចបន្តិចសោះអញ្ចឹងទៅអី? នាងអាំបញ្ជាឱ្យប្ដីចូលផ្ទះវិញ ប្ដីឆ្ងល់ក៏សួរ : "ទៅដងទឹកឱ្យអូនផឹកទៀតឬ?"។ នាងអាំតបទាំងមួរម៉ៅ:"កុំអាលយកមក ទុកខ្ញុំជេរឱ្យអស់ចិត្តសិន ទៅដងទឹកទុកឱ្យហើយទៅ ហើយដេកគងអន្ទាក់ខ្លាសិនទៅចាំខ្ញុំហៅ"។ នាងអាំបន្តស្រែកជេរតទៅទៀត: "ពួកឯងយកមាន់មកសងអញភ្លាម.បើពួកអែងស្ងោរម្ជូរគ្រឿងហើយ ដូសឱ្យអស់ពីឆ្នាំងមកសងអញ.បើគ្រាន់តែទើបបោចរោមហើយ យកមាន់ទាំងមូលមកសងអញកុំអាលវះពោះយកគ្រឿងក្នុងចេញឱ្យសោះឡទេ? បើតាមបង្គាប់អញទើបរួចខ្លួន។ បើមិនអញ្ចឹងទេអញជេរដាក់បណ្ដាសាពីព្រឹកទល់យប់ពីយប់ទល់ព្រឹក។ អញដាក់បណ្ដាសាឱ្យពួកឯងស៊ីមាន់អញស្លាក់ជាប់កងាប់ទាំងពូជ។ ឱ្យឆ្អឹងជាប់កហូរឈាមចេញតាមមាត់ងាប់តែហោង ទាំងឪទាំងម៉ែទាំងកូនទាំងអស់ អាពូជដើរលួចគេ។ អើមើលចុះលោកអើយ! ងាប់ទាំងពូជវាឱ្យអស់ទៅខ្ញុំក្ដៅចិត្តណាស់...ហ៊ូ១១១...ប្ដីឮសូរមិនស្រួល.:"បែបយំទេដឹង ?" ប្ដីដើរតម្រង់មក: "ម៉េចមិនយកទឹកឱ្យគេផឹក ស្រែកសឹងតែដាច់បំពង់ក"។ និយាយរួចនាងអាំយកទឹកក្នុងកែវដែលប្ដីដួសទុកឱ្យស្រេចមកផឹកក្លឹកៗទាល់តែអស់រលីង។ រួចនាងអាំដើរចេញទៅវិញក្នុងបំណងបន្តការងារជេរបញ្ចោរតទៅទៀត។ ស្រាប់តែមានក្មេងជំទង់ម្នាក់ឈរឱបមាន់ជល់មួយចាំនាងនៅមុខផ្ទះ ។ ពេលឃើញនាងអាំអ្នកកំលោះជាអ្នកជល់មាន់និយាយដោយគួរសមថា:"បងស្រី!ខ្ញុំដឹងថាមាន់ជល់ជាទីស្រឡាញ់របស់ខ្ញុំនេះ មិនមែនជាមាន់ដែលបងស្រីបាត់ទេ តែបងឈប់ជេរទៅអ្នកស្រុកគេចង់សម្រាក តែយប់ហ្នឹងបងស្រីក្រោកជេរយ៉ាងណឹងទៀត ច្បាស់ជាអ្នកស្រុកស្លាប់អស់ដោយបណ្ដាសារបស់បងស្រីហើយ!។ បន្ទាប់មកមានអ៊ុំស្រីចំណាស់ម្នាក់ ឱបមេមាន់ធាត់មួយក្បាលមកជួបនាងអាំ:"ឈប់ជេរទៅក្មួយ អាចព្រៃណាវាហ៊ានលួចរបស់ក្មួយយ៉ាងនេះ យកមេមាន់នេះជំនួសទៅក្មួយ។ នាងអាំទទួលដោយសប្បាយរីករាយ ។ អ្នកសប្បុរសទាំងពីរក៏ដើរចេញទៅបាត់ទៅ មានអ៊ុំប្រុសចំណាស់ម្នាក់មកក្រោយគេ ឱបកញ្ជើដែលមានមេមាន់កំពុងក្រាបពងមួយសំបុកមកប្រគល់ឱ្យនាងអាំ : "ឈប់ជេរទៅនាង ផ្ទះខ្ញុំមានមេមាន់កំពុងក្រាបពងមួយនេះ មិនមែនរបស់នាងទេ នាងយកទៅ" នាងអាំទទួលយកដោយរីករាយ។ អ៊ុំប្រុសលាចេញទៅ នាងអាំឱបសម្បត្តិទាំងអស់ទៅបង្ហូតប្ដី: "បងមើល៍ជេរចំណេញណាស់បាត់តែមាន់មួយ ជេរបានមាន់បី!! យើងគិតជេរតទៅទៀត ជេរឱ្យទាល់តែបានគោមួយមកចញ្ចឹមយើងមិនទាន់មានគោ!"។ "អូននៅជេរតែម្នាក់ឯងចុះបង គ្រប់គ្រាន់ហើយ មិនចង់បានអីទៀតទេ ចូរអូនខំជេរម្នាក់ឯង ឱ្យមានបានចុះ លាហើយ!"។

នាងអាំឈរសម្លឹងប្ដីដើរចេញទៅ: "ជួយ! ជួយផងលោកអើយ!ខ្ញុំបាត់ប្ដីហើយ!"។ អ្នកទាំងបីនាក់ធ្លាប់តែមកជួយពេលនាងអាំបាត់មាន់ ក៏មកដល់ភ្លាម ក្រែងមានការអីជួយឿបានទៀត តែម្ដងនេះអ្នកទាំងបីនិយាយស្មើគ្នាថា: "ម្ដងនេះខ្ញុំមិនអាចជួយសងប្ដីអ្នកបានទេ អ្នកអើយសុំកុំជេរទៀត កម្មយើងហើយណឹងទ្រាំទៅ!។។

តទៅលេខក្រោយ

## Continue from page 6

## Cambodia-Linked ...

to be sentenced was Lee Tae-hwan, CEO of NSRIA Co Ltd, which is behind a $1 billion airport project in Siem Reap province, which has not yet broken ground, Mr. Cho said.

"[T]hey were punished for breach of trust in the process of getting a loan from Busan Savings Bank for Phnom Penh new city development project and Siem Reap new airport development project in Cambodia etc [sic]," he said.

Also among those to be arrested last month was Park Yeon-ho, the former chairman of Busan Savings Bank, who received a seven-year jail term, as well as Kim Hae-soo, who served as an aide for South Korean President Lee Myung-bak between 2008 and 2010.

In June, South Korean officials said prosecutors had widened their investigation from illegal loans at the bank to investments in Cambodia. At that time, construction on the 120-hectare, 6,000-unit CamKo City had stopped. As of yesterday, there was still no construction work going on at the side in Russei Keo district.

Kheng Ser, assistant to World City´s vice president, claimed he was unaware of the sentencing.

"I do not know because this is in Korea. We do not have any information here [in Cambodia]," he said, adding that the sentencing of World City´s CEO would not affect progress of the CamKo City project.

Without the project´s main investor, companies from Vietnam, China and Japan are now looking into taking over the CamKo project, said Sung Bonna, president of Bonna Realty, whose firm is involved in finding new capital for the venture.

"There are a lot of international parties interested in investing [and] who are waiting to take over," he said.

The Siem Reap airport project by NSRIA has also ground to a halt; even though the firm had initially announced that it would break ground in mid-2011. The proposed mega project is supposed to include a special economic zone and a new city, and the airport would process up to 15 million passengers a year when completed.

Secretary of State at the Council of Ministers Tekreth Samrach, who leads a government steering committee on the proposed airport project, said he was not aware that NSRIA´s CEO had been sentenced to jail in Korea, and added that the project would still go ahead.

"The problem of the company is not the problem of the project," Mr. Samrach said, adding that construction would begin in April or May. "The company is dealing with financial problems. One bank [Busan] collapsed. They need to find another new bank."

Sunny Soo, country head of the global realtor Knight Frank, said the developments could survive the loss of the CEOs.

"It depends," he said. "If it doesn´t reach outside these two people, there can be just a change of management. It doesn´t mean the projects don´t have a chance."

Still, Mr. Soo said that attracting new investors proves hard to access.

"It could have some negative impact if it is in the case of receiver-ship, when corporate transparency and image is important," he said.

*(Additional reporting by Hul Reaksmey)*

# បទសម្ភាសន៍ជាមួយ Kathy Egmont នាយកសាលា LCCPS នៅឡូវែល

ដោយ : ខ្មែរផុស

**ខាទី អេកម៉ន** ឆាទ័រ ស្គូល គឺជាសាលាសាធារណ ដែលដឹកនាំជាឯកជនដោយមនុស្សមួយក្រុម យើងរាយការណ៍ទៅក្រសួងអប់រំ តែយើងមានលទ្ធភាព



នឹងគ្រប់គ្រងតាមរបៀបយើងផ្ទាល់ គ្រូបង្រៀនមិននៅក្នុងបណ្តាញនៃសហជីពទេ -យើងធ្វើសេចក្តីសម្រេចដោយខ្លួនឯង ដែលនេះជាគុណប្រយោជន៍របស់សហគមន៍សាលារៀន យើងបើកទ្វារជូនក្មេងគ្រប់គ្នា អ្នកដែលសុំចូលរៀនយើងចាប់ឆ្នោតយក ដោយគ្មានជ្រើសរើសជាមុនទេ។

**ខ្មែរផុស :** សិស្សមានចេញថ្លៃអ្វីទេ ?

**ខាទី :** ឥតមានចេញថ្លៃអ្វីទេ គឺជាសាលាសាធារណជនដូចសាលាសាធារណឡូវែលដែរ យើងខិតខំធ្វើ



ដេបូរ៉ា ម៉ូទីរ បុគ្គលិកខ្មែរ — ខាទី អេកម៉ន នាយកសាលា ឆាទ័រស្គូល

មិនឱ្យសិស្សចេញថ្លៃអ្វីទាំងអស់ ព្រោះយើងដឹងថា សិស្សយើង៨៣ភាគរយ សុទ្ធជាគ្រួសារមានចំណូលតិចតួច -យើងនាំសិស្សឱ្យទទួលបទពិសោធន៍នានា ដោយមិនឱ្យចេញថ្លៃ ដើម្បីឱ្យសិស្សអាចងាយស្រួលទទួលជោគជ័យក្នុងជីវិត ដូចជានាំសិស្សទៅសារមន្ទីរសិល្បៈទៅសារមន្ទីរវិទ្យាសាស្ត្រ គឺធ្វើតាមវិធីដែលទោះជាគ្មានប្រាក់ក៏គេធ្វើទៅបានដែរ។

**ខ្មែរផុស :** តើការខុសគ្នារវាងសាលាឆាទ័រ ស្គូល នឹងសាលាសាធារណ ធ្វើឱ្យប្រជាពលរដ្ឋយល់យ៉ាងណាដែរ?

**ខាទី :** ខ្ញុំយល់ថា ការប្រជែងគ្នារវាងសាលាទាំងពីរនេះ គឺជារឿងល្អសម្រាប់សហគមន៍ល្អទាំងមុខរបរល្អទាំងសាលារៀន -ជាឆាទ័រ ស្គូល យើងមានសេរីភាពនឹងធ្វើអ្វីៗឱ្យមានប្រសិទ្ធភាពបាន យើងបានផ្តល់ឱ្យមនុស្សអាចជ្រើសរើសបាន គឺផ្លូវផ្សេងទៀតដែលក្មេងអាចរៀនបាន។

**ខ្មែរផុស :** តើឪពុកម្តាយក្នុងសហគមន៍ខ្មែរយល់ដឹងពីការខុសគ្នានេះយ៉ាងណា?

**ខាទី :** ខ្ញុំដឹងថា ការយល់របស់ពួកគាត់តែងតែខុសៗគ្នា យើងមានឯកសណ្ឋានសាលា ឪពុកម្តាយចូលចិត្តឱ្យមានឯកសណ្ឋានដែលសាលាសាធារណគ្មាន -យើងមានច្បាប់វិន័យផ្ទាល់ប្រចាំសាលាដែលមានកិរិតដែលសហគមន៍ទទួលបាន ឪពុកម្តាយចូលចិត្តឱ្យសាលាមានការគោរពវិន័យល្អ ខ្ញុំមានអារម្មណ៍ថា គ្រូបង្រៀនយើងនៅជិតកូនសិស្សខ្លួន តែធ្វើឱ្យសិស្សប្រឹងសិក្សាម្លោះហើយទទួលបានចំណេះខ្ពស់ជាងនៅសាលាធម្មតា។

**ខ្មែរផុស :** តើនៅឡូវែលឈ្នេះមានឆាទ័រ ស្គូល ចំនួនប៉ុន្មាន?

**ខាទី :** មានពីរ មួយសម្រាប់សិស្សវិទ្យាល័យ មួយទៀតគឺយើងនេះ ទាំងពីរស្ថិតនៅក្នុងក្រុង -នៅស.រ.អានេះ កាលណាគេមានលុយ គេមិនចូលចិត្តសាលាសាធារណ គេរត់ទៅរកសាលាឯកជន រីឯអ្នកក្រ គ្មានជម្រើសអ្វីក្រៅពីនៅសាលាសាធារណនោះទេ -ឥឡូវមានឆាទ័រ ស្គូល ដែលកំពុងផ្តល់ជម្រើសឱ្យសិស្សទាំងអស់មិនថាមាន ឬក្រនោះទេ ពីព្រោះជម្រើសថ្មីនេះ ឥតមានចំណាយប្រាក់ទេ បើគេចង់។

**ខ្មែរផុស :** តើនៅឡូវែលនេះ ឆាទ័រ ស្គូល អាចទទួលសិស្សបានប៉ុន្មានភាគរយ បើប្រៀបទៅនឹងសាលាសាធារណ Public School?

**ខាទី :** នៅឡូវែលមានសិស្សប្រមាណ៧ពាន់នាក់ នៅក្នុងនោះសិស្សរៀននៅឆាទ័រ ស្គូល មានជាង២ពាន់នាក់ ។ នៅស.រ.អា ប្រាក់ឧបត្ថម្ភសាលា Public School បានមកពីតម្លៃនៃអចលនវត្ថុ និងពន្ធអាករដើម្បីឱ្យសិស្សម្នាក់ៗអាចរៀនបាន -ប្រសិនបើសិស្សសាលា Public School ណាម្នាក់ត្រូវឪពុកម្តាយផ្ទេរឱ្យទៅរៀនសាលាឆាទ័រ ស្គូលវិញ ប្រាក់ឧបត្ថម្ភសិស្សនោះ ក៏ត្រូវប្តូរដៃពីសាលាសាធារណទៅឱ្យឆាទ័រ ស្គូលវិញដែរ ដូច្នេះសាលាសាធារណនឹងត្រូវបាត់ប្រាក់ចំណូលរបស់ខ្លួន -ជាទូទៅនៅក្រុងជាច្រើន សិស្សរៀននៅសាលាសាធារណហួសចំណុះ ដូច្នេះសាលាឆាទ័រស្គូល ជាអ្នកជួយសម្រាលចំណុះពួកគេ យកកូនសិស្សចេញខ្លះមែន តែមិនខាតប្រាក់ចំណូលប៉ុន្មានទេ -នៅទីក្រុងជាច្រើន ដោយសាររឿងនេះ សាលាទាំងពីរតម្លើងសំលៃដាក់គ្នា -ក្រុមសហជីពសាលាសាធារណមិនចូលចិត្តឆាទ័រ ស្គូលទេ -គ្រូនៅសាលាសាធារណមិនមាននរណាហ៊ានដេញចោលទេ ទោះជាធ្វើគ្មានលទ្ធផលក៏ដោយ រីឯនៅឆាទ័រ ស្គូល ខ្ញុំអាចទុកបានតែគ្រូណាដែលធ្វើការបានល្អប្រសើរប៉ុណ្ណោះ -នេះគឺជាការខុសគ្នារវាងសាលាទាំងពីរ -ខ្ញុំមិនដឹងថា លោកយល់យ៉ាងណាទេ តែខ្ញុំយល់ថាសាលារៀនត្រូវតែមានប្រសិទ្ធិភាព គ្រួសារអន្តោប្រវេសមិនពូកែអង់គ្លេស គឺគេត្រូវការពេលវេលា ត្រូវការគ្រូដែលចាប់អារម្មណ៍លើពួកគេ ត្រូវការមានបទពិសោធន៍ច្រើន ត្រូវការកន្លែងដែលយកចិត្តទុកដាក់ពីវប្បធម៌ខ្លួន ពុំមែនគំរូតែមួយសម្រាប់សិស្សទាំងអស់ដូចៗគ្នានោះទេ គឺក្មេងម្នាក់ពុំមានពីរដូចគ្នាទេ ហើយតែងតែមានអ្វីពិសេសជានិច្ច។

**ខ្មែរផុស :** នៅទីនេះមានជនជាតិអាស៊ីរស់នៅច្រើនជាពិសេសខ្មែរ តើការមករៀនរបស់សិស្សអាស៊ីមានយ៉ាងណាដែរ?

**ខាទី :** នៅសាលានេះមានសិស្សអាស៊ី២៥ភាគរយមករៀន យើងឃើញក្រុមថ្មីទើបមកដល់ពីអាហ្វ្រិកា ដែលកំពុងកើនចំនួន ហើយសិស្សដ៏មានចំនួនច្រើននោះ គឺហីស្បានីស ។ អ្នកដែលបង្កើតសាលា LCCPS នេះឡើងកាលពី១១ឆ្នាំមុន គឺមនុស្សពីអាស៊ីអាគ្នេយ៍ និងក្រុមស្បានីស ពេលនេះនៅឡូវែលមានក្រុម "គ្នេង" ខ្មែរ និងស្បានីសវាយតប់គ្នាមិនឈប់ សាលានេះបង្កើតឡើងសម្រាប់ជាជម្រកនៃសេចក្តីសុខរួមគ្នា សិស្សមកពីគ្រប់មជ្ឈដ្ឋាននៅរៀនជាមួយគ្នា សិក្សាអំពីការរស់នៅជាមួយគ្នា ហើយគេនៅតែរៀនរហូតដល់ថ្ងៃនេះ នេះជាកត្តាសំខាន់មួយដែលយើងតែងរំលឹកដល់យុវជន និងមាតាបិតាអំពីរួមរស់សុខដុមរមនា ជាមួយវប្បធម៌ផ្សេងពីវប្បធម៌ខ្លួនឯង។

**ខ្មែរផុស :** តើកម្មវិធីដ៏អស្ចារ្យសម្រាប់ទប់ស្កាត់ទំនាស់ នោះជាអ្វីទៅអ្នកអាចរៀបរាប់ខ្លះផងបានទេ?

**ខាទី :** យើងធ្វើពិធីបុណ្យឱ្យគ្រប់វប្បធម៌ -យើងធ្វើបុណ្យចូលឆ្នាំខ្មែរ គឺជាបុណ្យដ៏ធំមួយនៅក្នុងបរិវេណសាលា ឪពុកម្តាយក៏មកភ្លេងខ្មែរក៏មាន -យើងធ្វើបុណ្យឱ្យវប្បធម៌អាហ្វ្រិកា -ឱ្យគូបិន ឬឱ្យការីបៀន ដូចជាខែនេះ យើងធ្វើ "ខែនៃប្រវត្តិពួកស្បែកខ្មៅនៅខែឧសភា" បុណ្យឱ្យស្បានីសនៅខែកញ្ញា -យើងរៀបពិធីសម្រាប់ពេញមួយឆ្នាំ ធ្វើបុណ្យរបស់សិស្សយើង។

**ខ្មែរផុស :** កូនខ្មែរមានចូលវាយស្គជាមួយកូនពួកស្បែកខ្មៅទេ?

**ខាទី :** ទាំងអស់គ្នា វាយចូលគ្នា ធ្វើអ្វីក៏បានតាមចិត្តចង់ មានសិស្សស្បានីសចង់រាំរបាំខ្មែរ ឯខ្មែរក៏ចង់រាំស្បានីសក៏មាន... (នៅមានតលេខក្រោយ)

តមកពីទំព័រទី ២

# គ្រួសារខ្មែរក្រោកឈរដោយ...

ទាំងស្រុង -លទ្ធផលយុវជនទី១ បានបញ្ចប់ថ្នាក់វិទ្យាល័យ ឥឡូវទៅរៀននៅសាលកវិទ្យាល័យ រីឯយុវជនទី២ ត្រឡប់បោះបង់សាលាសាជាថ្មី ដោយគ្មានការគាំទ្រពីឪពុកម្តាយ ។

**២**-ជម្លោះរវាងម្តាយ និងកូនពេញវ័យតែងតែកើតជារឿយៗក្នុងគ្រួសារ តែគ្រួសារមួយនោះកូនប្រុសខឹងសម្បារ រហូតដល់មានប្រើកាំបិតកាប់ តុ ទូ ជញ្ជាំង ធ្វើឱ្យម្តាយភ័យមិនហ៊ាននៅផ្ទះខ្លាចកូនប្រុសធ្វើឱ្យមានរបួស នៅពេលបានទទួលការណែនាំក៏ប្រែជាចុះសម្រុងយ៉ាងសុខុដម្យ ហើយជួយគ្នាបានទៅវិញទៅមកទៀតរហូតដល់សព្វថ្ងៃ (២ឆ្នាំហើយ) ។

**៣**-គ្រួសារមួយមានកូនបួននាក់ ប្រពន្ធមានជំងឺខួរក្បាល ចេះតែឮសំឡេងគេនិយាយក្នុងត្រចៀក ហើយចេះតែបារម្ភខ្លាចគេធ្វើបាបកូនមិនឈប់ ប្តីនៅថៃទាំប្រពន្ធ និងកូនយ៉ាងស្ងៀមស្ងាត់មិននិយាយខ្លាចខ្មាស់គេ រហូតដល់ឮព័ត៌មានមួយតាមកាសែតខ្មែរ មានម្តាយម្នាក់មានជំងឺខួរក្បាល បានសម្លាប់កូនខ្លួនឯងពីរនាក់ ដោយខ្លាចគេធ្វើបាបកូននៅពេលខ្លួនធ្វើអត្តឃាតទៅ រីឯជីតាកុមារទាំងពីរមានវិប្បដិសារី ហើយពោលថា "ខ្ញុំស្តាយណាស់ដោយមិនបានហៅឱ្យគេជួយ ទីកស្ថានថាមិនអី តាមពិតជំងឺនេះគេអាចជួយចៅខ្ញុំបានសោះ" ។-បានដំណឹងនេះភ្លាមក៏ហៅ"ភីក"យើងជួយ តាមរយៈអតីតសមាជិកម្នាក់ -សកម្មភាពជួយក្នុងភាពអាសន្ន បានបញ្ជូនទៅដល់ផ្ទះនារីជាម្តាយជាបន្ទាន់ ។ ឥឡូវនេះ៨ខែហើយស្ត្រីជាម្តាយមានអារម្មណ៍ហ្នឹងន់ ភាពប្រក្រតីវិញហើយ អាចទៅរៀន ESLបាន នៅមើលកូនចៅធ្វើម្ហូបបានទៀតផង ។ល។

ឧទាហរណ៍នេះ បានធ្វើឱ្យមេគ្រួសារខ្មែរយល់ ថាសេវាសម្រាប់ជួយបុគ្គល់ និងគ្រួសារ មានច្រើនមុខច្រើនស្រទាប់ មនុស្សម្នាក់ឬគ្រួសារតែមួយ មិនអាចធ្វើបានទេ ហេតុនេះហើយបានជាសិស្សចាស់នៃកម្មវិធី"ភីក" បានមូលមតិគ្នា ធ្វើឱ្យចលនាជួយគ្នាតាមចិត្តសាស្ត្រនេះក្លាយទៅជាសមាគមដែលឱ្យឈ្មោះថា "សមាគមគាំទ្រគ្រួសារខ្មែរ"មានអាសយដ្ឋាននៅវត្តព្រះពុទ្ធរង្សី ។

**តើសមាគមនេះជួយគ្នារបៀបណា?** ជាដំបូងបង្អស់នោះ សមាគមមិនមានបំណងឱ្យសមាជិករស់នៅដោយឯកឯង គ្មានមិត្តភក្តិជួយយកអាសារគ្នានៅគ្រាក្រនោះទេ ហើយដើម្បីជួយគ្នាឱ្យបានត្រឹមត្រូវយើងត្រូវចូលរួមសិក្សាវិជ្ជា ជាឪពុកម្តាយត្រឹមត្រូវមានបច្ចេកទេសសម្រាប់ដោះស្រាយបញ្ហាយ៉ាងងាយស្រួល រៀនវិជ្ជាខាងទំនាក់ទំនងកុំឱ្យបង្កើតទំនាស់ឬជម្លោះ ឬក៏សិក្សាវិធីសម្គាល់និងជួយសង្គ្រោះ ដល់អ្នកមានបញ្ហាផ្លូវចិត្តជាដំបូង មុននិងអ្នកឯកទេសមកដល់...។ល។ បណ្តាញនេះមានបង្រៀនវិធីបង្កើនការទុកចិត្តលើខ្លួនឯង បន្ថយកំហឹងឬគំនុំ ហើយនឹងជួយដល់អ្នកដទៃ ឱ្យរំសាយកំហឹងបានទៀតផង ។ ក្រៅពីនេះសមាគមនឹងផ្តល់ធនធានជាចំណេះ ជាឯកសារសម្រាប់គ្រួសារក្នុងសហគមន៍ អាចរកជំនួយបានគ្រប់យ៉ាង សម្រាប់ប្រើប្រាស់ផ្ទាល់ខ្លួនទៀតដែរ ។

លោកអ្នកភ្ញាក់ផ្អើលនឹងដំណើរចេញមុខរបស់គ្រួសារខ្មែរ ពីព្រោះមិនដែលមានពីមុនមក តែបើតាមឧទាហរណ៍ខាងលើ សុទ្ធតែរបស់ធ្វើបានដោយខ្លួនឯង ដូចនេះ ការបង្កើនសមត្ថភាពរបស់គ្រួសារជាទង្វើគួរឱ្យគោរពបាន ជាប្រាកដ ៕



# រមណីយដ្ឋានទឹកធ្លាក់ ភ្នំខៀវនៅខេត្តប៉ៃលិន





រមណីយដ្ឋានទឹកធ្លាក់អូរតាវៅ ឬហៅថា ទឹកធ្លាក់ភ្នំខៀវដែលមានទីតាំងស្ថិត នៅភូមិខ្ចុង សង្កាត់អូរតាវៅ ក្រុងប៉ៃលិន ខេត្តប៉ៃលិន យើងអាចធ្វើដំណើរតាមផ្លូវជាតិលេខ៥៧មានចម្ងាយប្រមាណ៨០គីឡូម៉ែត្រពីទីរួមខេត្តបាត់ដំបង ។ អ្នកទេសចរអាចទៅងូតទឹកកម្សាន្តនៅទីនោះបានគ្រប់រដូវ ប៉ុន្តែនៅរដូវវស្សាមានទឹកធ្លាក់ខ្លាំង និងហូរត្របាញ់ខ្ពួលខ្ពាញ់ រីឯនៅរដូវប្រាំងវិញទឹកហូរតិចៗប៉ុណ្ណោះ ។

●●●រមណីយដ្ឋានទឹកធ្លាក់នេះបានបង្កើតឡើងនៅឆ្នាំ២០០៥ ទឹកធ្លាក់នេះមានប្រភពមកពីភ្នំខៀវ ដែលលាតសន្ធឹងជាប់ព្រំដែនកម្ពុជា-ថៃ ហើយក៏ជាទឹកដីស្ថិតនៅក្រោមការគ្រប់គ្រងរបស់ពួកខ្មែរក្រហមកាលពីដំបូង ។ នៅតំបន់កម្សាន្តរមណីយដ្ឋានទឹកធ្លាក់នេះក្រៅពីការងូតទឹកកម្សាន្ត អ្នកទេសចរក៏អាចទិញម្ហូបអាហារដែលមានលក់នៅទីនោះយកមកបរិភោគបានដោយងាយ ហើយក៏មានវត្ថុអនុស្សាវរីយ៍ផ្សេងៗធ្វើពីវល្លិ៍ និងផ្លែផលិតដោយដៃប្រជាកសិករនៅមូលដ្ឋាននេះសម្រាប់លក់ជូនផងដែរ ។

រមណីយដ្ឋានទឹកធ្លាក់នេះទទួលការគាំទ្រពីអ្នកទេសចរគ្រប់មជ្ឈដ្ឋាន សូម្បីតែជនបរទេស ក៏មកកម្សាន្តជាហូរហែដែរ ជាពិសេសនៅ រដូវបុណ្យទានធំៗ ដូចជាបុណ្យ ចូលឆ្នាំខ្មែរ ភ្ជុំបិណ្ឌ ចូលឆ្នាំចិន ជាដើម ។ **តទៅទំព័រទី ១៧**







# កោះរុងនឹងក្លាយជាតំបន់ឆ្នេរធម្មជាតិ ដ៏ប្រណិតរបស់អាស៊ី

**ដោយ : ខ្មែរប៉ុស្ដិ៍**

**កោះរុងជាកោះមួយស្ថិតនៅចំងាយ៤៤គីឡូម៉ែត្រពីឆ្នេរសមុទ្រខេត្តព្រះសីហនុនៃប្រទេសកម្ពុជា ។ វាមានផ្ទៃដី៧៨គីឡូម៉ែត្រការ៉េ និងមានប្រវែងជើងត្បូងប្រហែល១០គម ។ ចំណុចខ្ពស់បំផុតរបស់កោះរុងមានកម្ពស់១៣៣ម៉ែត្រពីនីវ៉ូសមុទ្រ ។ ក្រុមហ៊ុន មីលីនៀមហ្គ្រូបរបស់បរទេស និងក្រុមហ៊ុនរ៉ូយ៉ាល់ហ្គ្រុបមានគម្រោងអភិវឌ្ឍន៍មួយដើម្បីផ្លាស់ប្តូរមុខមាត់កោះនេះឱ្យក្លាយទៅជារមណីដ្ឋានធម្មជាតិ និង វីសតដ៍ប្រណិត ។ កោះនេះមានគម្រោងអភិវឌ្ឍន៍ក្នុងរយៈពេលលើសពី២០ឆ្នាំ ។**

●●●ប្រទេសកម្ពុជាមានសមុទ្រស្អាត និងពោរពេញទៅដោយជីវចម្រុះគ្រប់ប្រភេទនៅបាតសមុទ្រដោយគេឃើញមានផ្កាថ្មដុះ នៅជុំវិញកោះរុង និងកោះរុងសន្លឹម ។ ហើយនាពេលឆាប់ៗខាងមុខនេះកោះរុងអាចជាប់ចំណាត់ថ្នាក់ ដូចជាតំបន់ឆ្នេរភូកេតកោះសាម៉ុយ និងកោះបាលីផងដែរ ហើយគម្រោងដ៏ស្រស់ត្រកាលនៃកោះរុងនេះអាចក្លាយទៅជាតំបន់ឆ្នេរធម្មជាតិដ៏ប្រណីតនៅអាស៊ុី ។

ស្ថាបត្យករ និងអ្នកប្រឹក្សាបរិស្ថានបានសហការគ្នាបង្កើតគម្រោងតំបន់លំហែកាយប្រកបដោយបរិស្ថានល្អនៅអាស៊ីដែលនៅក្នុងការសិក្សាស្រាវជ្រាវនៃគម្រោងការនេះ មានរយៈពេល២៥ឆ្នាំដើម្បីធ្វើការអភិវឌ្ឍន៍ និងកំណែទម្រង់កោះនេះ ។

តាមសំដី លោក ដេវីត ស៊ីមីស្ទ័រ (David Simister) ប្រធានក្រុមហ៊ុន CB Richard Ellis Thailand បាននិយាយថា លោកកំពុងស្វែងរកអ្នកវិនិយោគនៅក្នុងតំបន់ និងនៅបរទេសដែលមានទស្សនៈអភិវឌ្ឍន៍បរិស្ថាន និងជាមនុស្សដែលចង់បង្កើតតំបន់លំហែកាយថ្មីនៅអាស៊ីអាគ្នេយ៍ ។ ខណៈដែលការសិក្សាបានបង្ហាញពីព័ត៌មានលម្អិតទាក់ទងទៅនឹងគម្រោងដែលមានព្រលានយន្ត ហោះអន្តរជាតិរួមទាំងសណ្ឋាគារតំបន់លំហែកាយ ទីវាលវាយកូនហ្គោល និងផ្សារទិញទំនិញដែលចំណុច ទាំងអស់នេះសុទ្ធសឹងមានបង្ហាញនៅក្នុងគម្រោងទិសដៅអភិវឌ្ឍន៍ ។

គម្រោងការអភិវឌ្ឍន៍នៅលើកោះរុងនេះដើម្បីទទួលបាននូវបរិស្ថានបៃតងនៅលើភពផែនដី ហើយការធ្វើកសិកម្មធម្មជាតិនឹងត្រូវយកមកអនុវត្ត ហើយទឹកស្អាតនឹងត្រូវនាំយកមកពីកន្លែងស្តុកទឹក និងធ្វើទំនប់ទប់ទឹកនៅលើកោះ ហើយប្រជាជននឹងត្រូវបានផ្តល់នូវចំណេះដឹងទាក់ទងនឹងការការពារបរិស្ថាន ។

កោះរុងនេះស្ថិតនៅចំងាយ៤៤ គីឡូម៉ែត្រពីតំបន់ឆ្នេរសមុទ្រខេត្តព្រះសីហនុនៅកម្ពុជាដែលគេស្គាល់ កាលពីដើមឆ្នាំនេះ ដោយទស្សនាវដ្តីជំនួញអន្តរជាតិហ្វ៊ប (Forbes) ដែល ដាក់កោះរុងនៅក្នុងចំណោមកោះល្អប្រណីតនៅអាស៊ុី ៕

# រីករាយរាំកំសាន្តជាមួយយុវជន

កាលពីថ្ងៃសៅរ៍ទី ១៧ ខែមិនា ឆ្នាំ២០១២

កំដរដោយ "ក្រុមតន្ត្រីអាវុធសំងាត់" "ក្រុមតន្ត្រីក្មេងខូច" និង "ក្រុមតន្ត្រីជនភៀសខ្លួន"

THE REFUGEEZ BAND

THE BAD BOYZ BAND

THE SECRET WEAPON BAND

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី

ច្បាប់ចេញផ្សាយថ្ងៃព្រហស្បតិ៍ ទី២២ ខែមីនា ឆ្នាំ២០១២

## ផ្តន្ទាទោសវិនិយោគិនកូរ៉េឱ្យជាប់ពន្ធនាគារនៅទីក្រុងសេអ៊ូល

**ដោយ Simon Lewis**
**ខេមបូឌា ដេលី**

យោងតាមមន្ត្រីតុលាការកូរ៉េខាងត្បូងម្នាក់បានឱ្យដឹងថា នាយកប្រតិបត្តិក្រុមហ៊ុនមួយចំនួន ដែលនៅពីក្រោយគម្រោងអចលនទ្រព្យដ៏ធំចំនួនពីរនៅក្នុងប្រទេសកម្ពុជា ត្រូវបានតុលាការផ្តន្ទាទោសដាក់ពន្ធនាគារក្នុងទីក្រុងសេអ៊ូលពីបទទទួលប្រាក់កម្ចីខុសច្បាប់ និងប្រើប្រាស់ប្រាក់នោះដើម្បីធ្វើហិរញ្ញប្បទានដល់ក្រុមហ៊ុនក្លែងក្លាយមួយចំនួននៅក្រៅប្រទេស។

នាយកប្រតិបត្តិពីររូបស្ថិតក្នុងចំណោមបញ្ជីឈ្មោះមន្ត្រីដ៏វែងនៅធនាគារ Busa Savings Bank ដែលត្រូវបានផ្តន្ទាទោសកាលពីខែមុននៅក្នុងប្រទេសកូរ៉េខាងត្បូង ពីបទជាប់ពាក់ព័ន្ធនឹងការបែងចែកប្រាក់កម្ចីខុសច្បាប់ និងបង់ប្រាក់ឱ្យមន្ត្រីរដ្ឋាភិបាល ដើម្បីបិទបាំងរឿងនេះ។

លោក ចូ វុន-យ៉ុង មន្ត្រីផ្នែកព័ត៌មាននៅតុលាការ Central District ក្នុងទីក្រុងសេអ៊ូលបានលើកឡើងតាមអ៊ីមែលកាលពីថ្ងៃពុធថា លោក លី សាង-ហូ នាយកប្រតិបត្តិក្រុមហ៊ុន World City Co Ltd ជាក្រុមហ៊ុននៅពីក្រោយគម្រោងសាងសង់ក្រុងរណបកាំកូ ស៊ីធី ដែលមានទឹកប្រាក់ពីរពាន់លានដុល្លារនៅរាជធានីភ្នំពេញក្នុងខណ្ឌឫស្សីកែវ ដែលបច្ចុប្បន្ននេះកំពុងជាប់គាំងនោះ ត្រូវផ្តន្ទាទោសឱ្យជាប់ពន្ធនាគាររយៈពេលប្រាំឆ្នាំ កាលពីថ្ងៃទី២១ ខែកុម្ភៈ។

លោក ចូ បានមានប្រសាសន៍ថា បុរសទីពីរម្នាក់ទៀតត្រូវបានផ្តន្ទាទោសឱ្យជាប់ពន្ធនាគារដែរនោះ គឺលោក លីតែ-វ៉ាន់ នាយកប្រតិបត្តិក្រុមហ៊ុន NSRIA Co Ltd ដែលនៅពីក្រោយគម្រោងសាងសង់អាកាសយានដ្ឋានមួយក្នុងខេត្តសៀមរាប ដែលមានទឹកប្រាក់១ពាន់លានដុល្លារ ប៉ុន្តែគម្រោងនេះមិនទាន់បានបើកការដ្ឋាននៅឡើយទេ។

លោកបានមានប្រសាសន៍ថា "ពួកគេត្រូវបានដាក់ទោសពីបទរំលោភសេចក្តីទុកចិត្តក្នុងការទទួលប្រាក់កម្ចីពីធនាគារ Busan Savings សម្រាប់គម្រោងអភិវឌ្ឍន៍ក្រុងរណបថ្មីក្នុងរាជធានីភ្នំពេញ និងគម្រោងអភិវឌ្ឍន៍អាកាសយានដ្ឋានថ្មីនៅខេត្តសៀមរាបក្នុងប្រទេសកម្ពុជា"។

ស្ថិតក្នុងចំណោមអ្នកដែលបានចាប់ខ្លួនកាលពីខែមុនផងដែរនោះ គឺលោក ប៉ាក យុន-ហូ អតីតប្រធានធនាគារ Busan Savings ដែលត្រូវបានកាត់ឱ្យជាប់ពន្ធនាគាររយៈពេលប្រាំពីរឆ្នាំ ព្រមទាំងលោក គីម ហា-ស៊ូ ដែលជាជំនួយការលោក លី ម្យ៉ុងបាក់ ប្រធានាធិបតីកូរ៉េខាងត្បូង ចាប់ពីឆ្នាំ២០០៨ ដល់ ឆ្នាំ ២០១០។

កាលពីខែមិថុនា មន្ត្រីកូរ៉េខាងត្បូងបានលើកឡើងថា រដ្ឋអាជ្ញាបានពង្រីកការស៊ើបអង្កេតរបស់ខ្លួនពីប្រាក់កម្ចីខុសច្បាប់នៅធនាគារនេះ ដល់ការវិនិយោគទុននានានៅក្នុងប្រទេសកម្ពុជា ។ នៅពេលនោះ ការសាងសង់ក្រុងរណបកាំកូស៊ីធីដែលមានផ្ទះ ៦.០០០ ល្វែងលើផ្ទៃដីទំហំ១២០ហិចតា បានបញ្ឈប់ទៅហើយ ។ រហូតមកដល់ថ្ងៃម្សិលមិញនេះ នៅមិនទាន់ឃើញមានការបន្តសាងសង់នៅឯការដ្ឋានស្ថិតក្នុងខណ្ឌឫស្សីកែវនេះនៅឡើយទេ។

លោក ខេង សើ ជំនួយការអនុប្រធានក្រុម ហ៊ុន World City បានអះអាងថា លោកមិនដឹងពីការផ្តន្ទាទោសនេះទេ។

លោកបានមានប្រសាសន៍ថា "ខ្ញុំមិនដឹងរឿងនេះទេ ពីព្រោះរឿងនេះស្ថិតនៅក្នុងប្រទេសកូរ៉េ ។ នៅទីនេះ (នៅកម្ពុជា) យើងមិនដឹងព័ត៌មានណាមួយទេ" ។ លោកបានបន្ថែមថា ការផ្តន្ទាទោសនាយកប្រតិបត្តិក្រុមហ៊ុន World City នឹងមិនប៉ះពាល់ដល់ការវិវឌ្ឍរបស់គម្រោងសាងសង់ក្រុងរណបកាំកូស៊ីធីទេ។

លោក ស៊ុង ប៊ុណ្ណា ប្រធានក្រុមហ៊ុនអចលនទ្រព្យប៊ុណ្ណា រៀលធី ដែលក្រុមហ៊ុនលោកបានចូលរួមក្នុងការស្វែងរកទុនសម្រាប់ការវិនិយោគរួមគ្នានេះបាន មានប្រសាសន៍ថា បើគ្មានវិនិយោគិនសំខាន់សម្រាប់គម្រោងនេះទេ ក្រុមហ៊ុននានាមកពីវៀតណាម ចិន និងជប៉ុន ឥឡូវនេះកំពុងព្យាយាមបន្តគម្រោងកាំកូស៊ីធី នេះ។

លោកបានមានប្រសាសន៍ថា "មានដៃគូក្រៅប្រទេសជាច្រើនចាប់អារម្មណ៍ក្នុងការវិនិយោគនេះ និងកំពុងរង់ចាំគ្រប់គ្រងបន្ត"។

គម្រោងសាងសង់អាកាសយានដ្ឋាននៅខេត្តសៀមរាបរបស់ក្រុមហ៊ុន NSRIA ក៏បានគាំងដំណើរការផងដែរ បើទោះជាដំបូងឡើយក្រុមហ៊ុននេះបានប្រកាសថា ខ្លួននឹងបើកការដ្ឋាននៅពាក់កណ្តាលឆ្នាំ២០១១ក៏ដោយ ។ គម្រោងដ៏ធំនេះរួមមានតំបន់សេដ្ឋកិច្ចពិសេស ក្រុងថ្មីមួយ ហើយអាកាសយានដ្ឋាននឹងទទួលអ្នកដំណើររហូតដល់១៥លាននាក់ក្នុងមួយឆ្នាំ នៅពេលសាងសង់រួចរាល់។

លោក តែក្រិត សម្រេច រដ្ឋលេខាធិការទីស្តីការគណៈរដ្ឋមន្ត្រី ដែលដឹកនាំគណៈកម្មាធិការនាយករបស់រដ្ឋាភិបាលទទួលបន្ទុកសាងសង់អាកាសយានដ្ឋាននេះ បានមានប្រសាសន៍ថា លោកមិនដឹងថា នាយកប្រតិបត្តិក្រុមហ៊ុន NSRIA ត្រូវបានផ្តន្ទាទោសឱ្យជាប់ពន្ធនាគារក្នុងប្រទេសកូរ៉េទេ ហើយលោកបានបន្ថែមថា គម្រោងនេះនឹងនៅតែបន្តដដែល ៕

*ប្រែសម្រួលដោយ សោម សារុន*

តមកពីទំព័រទី ៣

## សាលាដំបូងខេត្តកោះកុងបាន...

តែកើតមានជារឿយៗបែបនេះ យើងនឹងបាត់បង់ទំនុកចិត្តពីភ្ញៀវទេសចរហើយ"។

លោក វណ្ណី បានមានប្រសាសន៍ថា ក្រោយពីមានព័ត៌មានអំពីគ្រោះថ្នាក់ក្រឡាប់រថយន្តកាលពីថ្ងៃអង្គារនេះ បញ្ហាសុវត្ថិភាពរបស់រថយន្តទេសចរណ៍ត្រូវបានលើកយកមកពិភាក្សានៅឯកិច្ចប្រជុំមួយរបស់ក្រុមការងារវិស័យទេសចរណ៍ផ្នែកឯកជន នៅសភាពាណិជ្ជកម្មកម្ពុជា។

"យើងគ្រោងនឹងលើកឡើង (ទៅរដ្ឋាភិបាល) ថា គួរតែមានការរឹតបន្តឹងការអនុវត្តន៍ច្បាប់ដើម្បីឱ្យមានសុវត្ថិភាព និងសន្តិសុខបន្ថែមទៀតសម្រាប់ភ្ញៀវទេសចរ និងអ្នកដំណើរ ។ បើសិនមិនមានការគោរពច្បាប់ទេ ពួកគេនឹងត្រូវទទួលទោស។

យើងនឹងលើកឡើងពីបញ្ហានេះទៅរដ្ឋមន្ត្រីក្រសួងទេសចរណ៍ ។ អាជ្ញាធរមូលដ្ឋានត្រូវធានាឱ្យបានថា មានការអនុវត្តន៍ច្បាប់ចរាចរណ៍ ។ មន្ត្រីក្រសួងទេសចរណ៍ លោក ថោង ខុន មិនអាចទាក់ទងសុំការអត្ថាធិប្បាយបានទេ"៕ *ប្រែសម្រួលដោយ ថូ ណារ៉ាន់*



## ស្រណោះដីខ្មែរម្តេចប្រែបាត់បង់

**ដោយ : អ៊ុម លឿម**

**១**-ឱដែនដីខ្មែរម្តេចប្រែបាត់បង់
ទំហំធំធេងក្រៃលែងមហា
**២**-នឹកដល់សុបិន្តទោរម្នេញណាស់ខ្ញុំ
គិតដល់រឿងចាស់បេះដូងអង្រួន
**៣**-ម្តេចស្រីសាកេតបែកពីខ្ញុំទៀត
បូរីរម្យអើយអ្នកកុំកន្តើយ
**៤**-ផ្តាំដល់ស្រះកែវថាខ្ញុំនឹកណាស់
ធ្លាប់រស់សុខសាន្តមិនដែលទោរម្នេញ
**៥**-ឱច័ន្ទបូរីម្តេចហីនៅស្សៀម
នឹកដល់ឧប៉ុលខ្ញុំសែនជូរចត់
**៦**-ត្រាត, ចាក់ជើងសោដៅក្នុងទ្រូងខ្ញុំ
កវីកូនខ្មែរបេះដូងពើតផ្សារ
**៧**-ឱសុខោទ័យម្ចាស់ថ្លៃខ្ញុំអើយ
បាត់បង់រូបអ្នកស្មើរក្ស័យមរណា
**៨**-បច្ចឹមបូរីទឹកដីដូចមាស
ឥឡូវអ្នកឃ្លាតធ្លាក់ដល់ដៃគេ

ធ្លាប់ល្បីផ្ទូរផង់លើដែនលោកា
ឥឡូវអនិច្ចារូវលាយបាត់សូន្យ ។
ចង់ប្រាប់ទៅមុំរលឹកណាស់ស្ងួន
ឱសុរិន្ទស្ងួនខ្លួនឃ្លាតឆ្ងាយហើយ ។
ក្នុងទ្រូងចង្អៀតឱរ៉ាឥតស្បើយ
តើថ្ងៃណាឡើយទើបជួបអ្នកវិញ ។
ម្តេចបានកម្មក្រាស់ឱ្យយើងឃ្លាតចេញ
សុរិន្ទមាសឆ្អិនពេលណាត្រឡប់ ។
ទឹកភ្នែកក្លាយឈាមព្រោះសៀមប្រាកដ
នគររាជ្យកំសត់ជាដែនសីម៉ា ។
ធ្លាប់រស់សុខុមឥតហ្មងចិន្តា
ចោរសៀមឫស្យាប្រហារបូរី ។
រាល់ថ្ងៃឥតស្បើយស្តាំងស្តមកាយា
ចង់ផ្តាំទៅថាគ្មានថ្ងៃភ្លេចទេ ។
សម្បត្តិស្តុកស្តុះល្អល្អះឥតទ្វេរ
បច្ចឹមមាសស្នេហ៍បូរីខ្ញុំអើយ ។

# អូបាម៉ានឹងទស្សនកិច្ចតំបន់គ្មានកងទ័ព បង្កើនសម្ពាធលើប្រទេសកូរ៉េខាងជើង

**ដោយ : Cambodia Daily**

ប្រធានាធិបតីបារ៉ាក់ អូបាម៉ា ដែលកំពុងស្វះស្វែងបង្កើនសម្ពាធលើប្រទេសកូរ៉េខាងជើងឱ្យបោះបង់អាវុធបរមាណូរបស់ខ្លួននោះ នឹងធ្វើទស្សនកិច្ចតំបន់គ្មានកងទ័ព(DMZ)តាមព្រំដែនដ៏មានភាពតានតឹងរបស់ប្រទេសកូរ៉េខាងត្បូង នៅថ្ងៃអាទិត្យមុនជំនួបកំពូលសន្តិសុខនុយក្លេអ៊ែរក្នុងទីក្រុងសេអ៊ូល ។

សេតវិមានបានឱ្យដឹងកាលពីថ្ងៃអង្គារថា ទស្សនកិច្ចរបស់លោក អូបាម៉ា ទៅកាន់តំបន់ព្រំដែននេះ នឹងជាសញ្ញាគាំទ្រដ៏ខ្លាំងមួយសម្រាប់ប្រទេសកូរ៉េខាងត្បូងនឹងក៏ជាសារមួយចំពោះប្រទេសកូរ៉េខាងជើងដែរ ខណៈដែលក្រុងវ៉ាស៊ិនតោនបង្កើតកិច្ចប្រឹងប្រែងអន្តរជាតិដើម្បីឱ្យការចរចាររំសាយនុយក្លេអ៊ែរដែលជាប់គាំងនេះដំណើរការឡើងវិញ ។

ប្រទេសកូរ៉េខាងជើងនឹងមិនចូលរួមកិច្ចប្រជុំកំពូលដែលលោក អូបាម៉ា នឹងជួបជាមួយប្រធានាធិបតីចិន ហ៊ូ ជីនថាវ នឹងជំរុញលោក ហ៊ូ ជីនថាវ ឱ្យប្រើឥទ្ធិពលដ៏យូរអង្វែងរបស់ក្រុងប៉េកាំងលើក្រុងព្យុងយ៉ាង ដែលនៅពេលថ្មីៗនេះ ការដឹកនាំត្រូវបានប្រគល់ទៅ លោក គីម ជុងអ៊ឹន ។

លោក Daniel Rusel នាយកជាន់ខ្ពស់ក្រុមប្រឹក្សាសន្តិសុខជាតិនៅសេតវិមានទទួលបន្ទុកតំបន់អាស៊ីបាននិយាយថា "យើងពិតជាសង្ឃឹមនឹងស្នើឱ្យប្រទេសចិនប្រើអំណាចដែលមានឥទ្ធិពលលើការធ្វើសេចក្តីសម្រេចនៅប្រទេសកូរ៉េខាងជើង" ។

ប្រទេសកូរ៉េខាងជើងបានសាកអាវុធនុយក្លេអ៊ែរពីរលើកមកហើយ ហើយសហរដ្ឋអាមេរិកនិយាយថា កម្មវិធីមីស៊ីលរង់ប្រតិបត្តិការឆ្ងាយរបស់កូរ៉េខាងជើងមានការជឿនលឿនយ៉ាងរហ័ស ។ ខណៈដែលក្រុមអ្នកជំនាញមន្ទិលសង្ស័យថា កូរ៉េខាងជើងគ្មានសមត្ថភាពធ្វើគ្រាប់បែកបរមាណូខ្នាតតូចដាក់លើក្បាលមីស៊ីលនោះ កាលពីឆ្នាំមុនក្រុងវ៉ាស៊ីនតោនបានព្រមានថា ទ្វីបអាមេរិកអាចរងការគំរាមកំហែងពីមីស៊ីលកូរ៉េខាងជើងក្នុងរយៈពេល៥ឆ្នាំទៀតនេះ ។

កាលពីខែមុនប្រទេសកូរ៉េខាងជើងបានឈានដល់កិច្ចព្រមព្រៀងមួយជាមួយក្រុងវ៉ាស៊ីនតោនដើម្បីផ្អាកការសាកល្បងនុយក្លេអ៊ែរ ការបាញ់មីស៊ីលរង់ប្រតិបត្តិការឆ្ងាយ និងការចម្រាញ់អ៊ុយរ៉ាន្យ៉ូមជាផ្នែកមួយនៃកិច្ចព្រមព្រៀង ដើម្បីចាប់ផ្តើមទទួលជំនួយស្បៀងជាថ្មី ប៉ុន្តែក្រោយមកបានប្រកាសថា ខ្លួននឹងបាញ់បង្ហោះរ៉ុកកែតដែលមានផ្ទុកផ្កាយរណប ដើម្បីអបអរខួបកំណើត១០០ឆ្នាំរបស់ស្ថាបនិក គីម អ៊ីលស៊ុង នៅខែក្រោយ ។

សហរដ្ឋអាមេរិកបាននិយាយថា ផែនការនេះអាចរំលោភកិច្ចព្រមព្រៀងសបម្រាមនុយក្លេអ៊ែរបណ្តោះអាសន្ននិងប៉ះពាល់ដល់ការបន្តផ្តល់ជំនួយស្បៀង ។

ទស្សនកិច្ចរបស់លោក អូបាម៉ា ទៅកាន់តំបន់គ្មានកងទ័ពដែលពុះចែកឧបទ្វីបនេះ ដោយសារសង្គ្រាមកូរ៉េឆ្នាំ ១៩៥០-៥៣ នោះ ត្រូវបានរៀបចំឡើងដោយសេតវិមានដែលជាឱកាសមួយសម្រាប់លោក អូបាម៉ា ថ្លែងអំណរគុណដល់ទាហានអាមេរិកប្រមាណ២០.០០០ នាក់ ដែលកំពុងឈរជើងក្នុងប្រទេសកូរ៉េខាងត្បូងនៅឡើយ ៕

## តមកពីទំព័រទី ១១ រមណីយដ្ឋានទឹកធ្លាក់ភ្នំខ្សៀវ...

រមណីយដ្ឋានទឹកធ្លាក់ភ្នំខៀវនេះមាន៧ជាន់ ហើយនៅជាន់ទី៧ដែលមានចម្ងាយប្រមាណ



៨០០ម៉ែត្រ ។ ចំណែកនៅជាន់ទី៦វិញពុំសូវមានអ្នកទេសចរទៅដល់ទេ ត្រូវដើរកាត់ព្រៃ ។

ភ្ញៀវទេសចរជាច្រើនដែលពួកគាត់បានទៅកម្សាន្តនៅទីនោះមានអារម្មណ៍ប្លែកភ្នែកណាស់ ព្រោះអ្វីៗមានលក្ខណៈធម្មជាតិពិតៗ រួមទាំងបរិស្ថានក៏មានការកែលម្អគួរឱ្យទាក់ទាញផងដែរ ព្រោះនៅទីនោះមានបរិយាកាសល្អមិនអាប់អួរ ហើយមានទិដ្ឋភាពដ៏ស្រស់ត្រកាលព្រមទាំងសំឡេងទឹកធ្លាក់ឈូៗហូរត្របាញ់បែកផ្កាគ្រែងធ្វើឱ្យអារម្មណ៍របស់ពួកគាត់ស្រស់ស្រាយសប្បាយរីករាយក្នុងចិត្តបំភ្លេចអស់នូវទុក្ខកង្វល់ដែលដក់នៅក្នុងអារម្មណ៍ជាយូរមកហើយនោះ ។

គួរបញ្ជាក់ថា កាលពីសម័យសង្គ្រាមខេត្តប៉ៃលិន គឺជាតំបន់ប្រទាញប្រទង់រវាងកងកម្លាំងរដ្ឋាភិបាល និងកងទ័ពខ្មែរក្រហម ហើយតំបន់ទឹកជ្រោះសំខាន់ៗត្រូវទទួលរងនូវគ្រាប់កាំភ្លើងផ្លោងគ្រប់ធុន ។ ប៉ុន្តែបច្ចុប្បន្ននេះប្រទេសកម្ពុជា ទទួលបាននូវសុខសន្តិភាពពេញលេញ តំបន់ទឹកធ្លាក់ភ្នំខៀវក៏បានក្លាយទៅជារមណីយដ្ឋានធម្មជាតិ ដែលកំពុងតែទាក់ទាញភ្ញៀវទេសចរជាតិ និងអន្តរជាតិឱ្យទៅកម្សាន្តជាច្រើនផងដែរ ៕

នាទី ប្រវត្តិសាស្ត្រ

# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : គីម វិមល**

**១០ មិថុនា :** លោក អាតាស៊ី ប្រធានអ៊ុនតាក់ បានប្រកាសថា "អកប្បកិរិយារបស់ក្រុមខ្មែរក្រហមបង្ហាញពីការរំលោភជាក់ស្តែង និងមិនអាចទទួលបានទៅលើកិច្ចព្រមព្រៀងក្រុងប៉ារីស"

**១២ មិថុនា :** "ក្រុមប្រឹក្សាសន្តិសុខស្នើឱ្យគ្រប់ភាគីគោរពកិច្ចព្រមព្រៀង ហើយកត់សំគាល់ថា មានភាគីមួយមិនបានអនុញ្ញាតឱ្យកងទ័ពមួកខៀវនៃអ.ស.ប ចូលតំបន់ដែលខ្លួនកាន់កាប់ ។

**១៣ មិថុនា :** ចូលដល់ដំណាក់កាលទី២នៃការអនុវត្តន៍កិច្ចព្រមព្រៀងរំសាយកងទ័ព។ ខ្មែរក្រហមប្រកាសមិនចូលរួម -ទ័ពអ៊ុនតាក់បានបង្ហាញខ្លួនតែត្រឹម៦៤ភាគរយប៉ុណ្ណោះ។

**១៨ មិថុនា :** ការប្រយុទ្ធដ៏ធំមួយរវាងរដ្ឋកម្ពុជា និងខ្មែរក្រហម ដើម្បីកាន់កាប់ផ្លូវជាតិលេខ១២ ដែលតភ្ជាប់ក្រុងកំពង់ធំទៅព្រះវិហារ ។

**១៩ មិថុនា :** កងទ័ពប្រទេសថៃយល់ស្របតាមទស្សនៈរបស់ខ្មែរក្រហម ហើយប្រកែកមិនព្រមព្រមានដាក់ទណ្ឌកម្មដល់ក្រុមខ្មែរក្រហម។

**២២-២៣ មិថុនា :** កិច្ចប្រជុំនៅតូក្យូស្តីពីការកសាងកម្ពុជាឡើងវិញ -ប្រទេសចំនួន៣៣ និងអង្គការចំនួន១៣ បានសន្យាមូលនិធិចំនួន៨៨០ លានដុល្លារអាមេរិក សំរាប់កសាងកម្ពុជា (ចំនួន២ឆ្នាំ)(មានកិច្ចប្រជុំក្រុមប្រឹក្សាជាតិជាន់ខ្ពស់ CNS ចូលរួមដោយក្រុមស្នូលនៃអ.ស.ប និងប្រទេសផ្សេងៗទៀត ទន្ទឹមគ្នានឹងកិច្ចប្រជុំនៅតូក្យូនោះដែរ) ។

អង្គប្រជុំទាំងអស់បានខំប្រឹងប្រែងដោះស្រាយទំនាស់តាមការយល់ឃើញរបស់ខ្មែរក្រហម ក៏ប៉ុន្តែគ្មានការព្រមព្រាង គ្មានការចោទប្រកាន់ គ្មានទាំងចង្អុលមុខរកអ្នកខុសទៀតផង -គេបានទុកពេលឱ្យមានការពិចារណារហូតដល់ថ្ងៃ២កក្កដា -សម្តេចសីហនុ បានប្រកាសថា "ខ្ញុំដឹងថាគោលដៅ គឺការដណ្តើមអំណាចដោយកម្លាំងទ័ព ពុំមែនដោយលទ្ធិប្រជាធិបតេយ្យទេ និងការបោះឆ្នោតទេ" ។

**២៤ មិថុនា :** អគ្គលេខាធិការអ.ស.ប ទទួលភារៈបេសកកម្មសន្តិភាពឈ្មោះ ម៉ារ៉េក គូលឌីង បានទៅភ្នំពេញ ហើយបញ្ជាឱ្យអ្នកទទួលខុសត្រូវអ៊ុនតាក់ ទាំងអស់បញ្ឈប់ការទិទានដល់ភាគីខ្មែរក្រហម។

**២៧ មិថុនា :** គណបក្សប្រជាជនកម្ពុជាប្រកាសថា "គណបក្សប្រជាជនតំណាងឱ្យនិរន្តភាពនៃឧត្តមគតិរបស់សង្គមរាស្ត្រនិយមរបស់សម្តេចសីហនុ" -រំសាយទ័ពអាកាសទាំងមូលរបស់រដ្ឋកម្ពុជាឱ្យទៅអ៊ុនតាក់។

**៣០ មិថុនា :** លោក អ៊ុង ជន វរជនគណបក្សប្រជាជនចុះចូលហ៊្វុនស៊ិនប៉ិច។

**១ កក្កដា :** អ៊ុនតាក់ផ្តើមគ្រប់គ្រងរចនាសម្ព័ន្ធរដ្ឋបាលដែលកំពុងដំណើរការ ជាពិសេសក្នុងតួនាទីទាំង៥ ដែលបានចែងក្នុងកិច្ចព្រមព្រាងក្រុងប៉ារីស។

**២ កក្កដា :** ភាគីខ្មែរក្រហមមិនឆ្លើយតបសំណើររបស់កិច្ចប្រជុំនៅតូក្យូ -អ៊ុនតាក់បង្ហាញភាពលំបាកនឹងរង់ចាំ។

**៨ កក្កដា :** កិច្ចប្រជុំ CNS ភាគីខ្មែរក្រហមបញ្ជាក់ពីការប្រកែកមិនអនុវត្តកិច្ចព្រមព្រាង -លោក ហ៊ុន សែន សុំឱ្យមានការដាក់ទណ្ឌកម្មនយោបាយ និងសេដ្ឋកិច្ចលើក្រុមខ្មែរក្រហម។

**១៤-១៥-១៦ កក្កដា :** ក្រុមទ័ពខ្មែរក្រហមបានវាយពង្រីកតំបន់របស់ខ្លួននៅព្រះវិហារ ហើយយកបានតំបន់ជាច្រើន។

**១៥ កក្កដា :** ផ្តើមបញ្ចូលបុគ្គលិកអ៊ុនតាក់ទៅគ្រប់គ្រងរចនាសម្ព័ន្ធរដ្ឋបាលនៅតាមខេត្ត -ការបញ្ចូលបុគ្គលិកនេះត្រូវធ្វើឱ្យហើយនៅខែតុលាដែលជាកាលបរិច្ឆេទគំរប់១ឆ្នាំ បន្ទាប់ពីមានកិច្ចព្រមព្រាង។

**២១ កក្កដា :** សម្លាប់រង្គាលលើយួន៨រូប និងទារក៧ថ្ងៃនៅភូមិទូកមាសខេត្តកំពត -ភ្លាមនោះអ៊ុនតាក់ចោទប្រកាន់ក្រុមរដ្ឋកម្ពុជា តែអង្កេតក្រោយមកទើបដឹងថា ទង្វើក្រុមខ្មែរក្រហម -នៅញូយ៉កអ.ស.ប សម្តែងការសោកស្តាយពីទង្វើរបស់ខ្មែរក្រហម ហើយគម្រាមថា នឹងកាត់ផ្តាច់ជំនួយកសាងជាតិ -អ.ស.ប បានសម្រេចយកសេចក្តីរាយការណ៍របស់អគ្គលេខាធិការ ដែលជាសម្តីការទូតដែលនៅមានការព្យាយាមនៅឡើយ ជាពិសេសសម្រេចបន្តអនុវត្តគោលការណ៍ បើទោះជាមានការលំបាក និងដកអាវុធចេញពីកងទ័ពខ្លះៗក៏ដោយ។

**២៥-២៦ កក្កដា :** អគ្គលេខាបស់ចលនារំដោះលោក សឺង សាន គឺលោក អៀង មូលី ដែលជាសមាជិកនៃ CNS បានត្រូវទទួលការគំរាមដោយប៉ូលិសរដ្ឋកម្ពុជា ដោយត្រូវគេឃុំខ្លួនជាច្រើនម៉ោង។

**២៩ កក្កដា :** ឧត្តមសេនីយ៍ រីដូ ចូលមកជំនួសឧត្តមសេនីយ៍ ឡូរីដុង ប្រមុខនៃកងកម្លាំងមួកខៀវអ៊ុនតាក់។

(មានតនៅលេខក្រោយ)



នាទី ព្រះពុទ្ធសាសនា

# ពុទ្ធប្បវត្តិអមដោយរូបភាព

- រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា
- បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
- ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
- បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

**១៨៦-** ជាធម្មតា ព្រះពុទ្ធជាម្ចាស់ទ្រង់តើងឡើងពីសឹងមុនពេលអរុណរះ, ទ្រង់ស្រង់ទឹក រួចហើយទ្រង់គង់ធ្វើសមាធិប្រមើលឧបនិស្ស័យសត្វលោកទាំងពួង ។ កាលដែលព្រះអង្គទ្រង់ជ្រាប់ថា អ្នកណាមួយមានឧបនិស្ស័យគួរទទួលយកព្រះធមិបាន ព្រះអង្គក៏ស្តេចយាងទៅកាន់លំនៅដ្ឋានរបស់អ្នកនោះ ហើយសំដែងធមិប្រោសក្នុងថ្ងៃនោះតែម្តង ។ ក្រោយពេលអរុណរះហើយ ព្រះអង្គទ្រង់ឃ្លុំចីវរ ទ្រង់កាន់បាត្រ រួចក៏យាងទៅបិណ្ឌបាត ។ មានពេលខ្លះព្រះអង្គទ្រង់យាងតែមួយអង្គឯង ជួនពេលខ្លះយាងទៅជាមួយនឹងភិក្ខុទាំងឡាយ ដោយនិមន្តជាជួរយ៉ាងសមរម្យបំផុត ។ ភិក្ខុទាំងអស់សុទ្ធតែប្រដាប់ដោយបាត្រក្នុងដៃគ្រប់ៗអង្គ ហើយទ្រង់និមន្តបិណ្ឌបាតតាមផ្ទះទាយកទាយិកាពីផ្ទះមួយទៅផ្ទះមួយប្រកបដោយតុណ្ហីភាព និងមានអាការៈគួរជាទីជ្រះថ្លា និងគួរជាទីពិតពិលរមិលរមើលក្រៃពេក ។

**១៨៧-** ជួនកាលមានទាយក ទាយិកា មកក្រាបថ្វាយបង្គំ និងនិមន្តព្រះអង្គទៅទទួលភត្តនៅឯផ្ទះរបស់ខ្លួន ។ ប្រសិនបើជាការសមរម្យ ព្រះអង្គទ្រង់តែងទទួលការនិមន្តរបស់ទាយកទាយិកានោះៗ ។ នៅឯផ្ទះទាយកទាយិកា ព្រះអង្គគង់លើអាសនៈ ដែលគេរៀបចំបំរុងទុករួចជាស្រេច ហើយជនជាម្ចាស់ផ្ទះក៏ទទួលយកបាត្ររបស់ព្រះអង្គទៅដាក់បំពេញដោយភោជនដ៏ប្រណីត ហើយក៏ថ្វាយព្រះអង្គឆាន់ ។ ក្រោយពីទ្រង់បានសំរេចភត្តកិច្ចបរិបូណ៌ហើយ ព្រះបរមសាស្តាចារ្យទ្រង់សំដែងអមិដល់ជនទាំងឡាយដែលមកជុំគ្នានៅទីនោះ, ញ៉ាំជននោះៗឱ្យបានយល់ច្បាស់ថា អំពើល្អ ឬអាក្រក់ដែលខ្លួនបានធ្វើហើយ ខ្លួនឯងនឹងជាអ្នកទទួលផលជាសុខ ឬទុក្ខយ៉ាងប្រាកដក្នុងពេលបច្ចុប្បន្ន ឬអនាគតមិនខានឡើយ ។ ព្រះមហាករុណាជាម្ចាស់ទ្រង់ប្រទាន់ព្រះឱវាទដល់ជនទាំងឡាយឱ្យខំប្រព្រឹត្តប្រតិបត្តិធមិដោយយកចិត្តទុកដាក់ ។ កាលបើសំដែងធមិចប់។

**១៨៨-**នៅឯក្នុងវត្តនោះវិញ, ព្រះពុទ្ធជាម្ចាស់ទ្រង់តែងគង់ដោយស្ងៀមស្ងាត់នៅក្នុងសាលាសំរាក ឬនៅក្រោមម្លប់ឈើមួយអន្លើដោយបរិស័ទនៅអមជុំវិញ ទ្រង់រង់ចាំលុះត្រាតែភិក្ខុទាំងឡាយនិមន្តត្រឡប់មកពីបិណ្ឌបាត កាលបើទ្រង់ឆាន់រួចរាល់ហើយ ព្រះអង្គទ្រង់យាងទៅសំរាកបន្តិច ។ លុះដល់ភិក្ខុទាំងឡាយមកជុំគ្នាក្នុងសាលាធម្មសភាអស់ហើយ ព្រះអង្គទ្រង់ប្រោសប្រទានធម្មវិសេសទេសនាសមគួរទៅដល់កាលវេលា ។ ម្យ៉ាងទៀត ព្រះអង្គទ្រង់តែងសរសើរដល់ភិក្ខុទាំងឡាយនៅពេលកំពុងធ្វើធម្មសាកច្ឆាធមិ ឱ្យខំប្រឹងយកចិត្តទុកដាក់រៀន និងប្រតិបត្តិធមិវិន័យឱ្យបានត្រឹមត្រូវ ដើម្បីឱ្យភិក្ខុទាំងអស់បានសំរេចដល់គោលដៅនៃព្រះនិព្វានក្នុងបច្ចុប្បន្នជាតិនេះ។

**១៨៩-**ពេលដែលព្រះបរមគ្រូទ្រង់សំដែងធមិចប់ហើយ, ជាធម្មតាមានភិក្ខុអង្គខ្លះ លោកតែងទូលសួរឱ្យទ្រង់បញ្ជាក់បន្ថែមនូវគោលធមិសំខាន់ៗ ដើម្បីឱ្យខ្លួនបានយល់ច្បាស់ និងទន្ទេញឱ្យចាំមាត់តាមរបៀបណាមួយ ដែលសមតាមឧបនិស្ស័យរបស់ខ្លួន ។ ពេលនោះ ព្រះមហាករុណាទ្រង់ពិចារណាមើលនូវចរិតលក្ខណៈ និងគីរិតនៃការចំរើនជឿនលឿនរបស់ភិក្ខុ រួចហើយទ្រង់ក៏ត្រាស់សំដែងជាឃ្លាខ្លីៗ ន័យរាក់ៗ ដែលងាយនឹងយល់បានបំផុតសំរាប់ភិក្ខុដែលមានប្រាជ្ញាតិច ឬឃ្លាដែលមានន័យជ្រាលជ្រៅសំរាប់ភិក្ខុដែលមានប្រាជ្ញាយល់ដឹងខ្ពង់ខ្ពស់ ។ ក្រោយពីបានស្តាប់ព្រះអង្គរួចហើយ ភិក្ខុទាំងឡាយក៏និមន្តទៅកាន់ទីផ្សេងៗគ្នា. អង្គខ្លះស្វែងរកកន្លែងស្ងប់ស្ងាត់នៅក្នុងព្រៃ ឬនៅក្រោមដើមឈើ ឬនៅក្នុងផ្ទះស្ងាត់ដែលគេបោះបង់ចោល ដែលជាកន្លែងលោកអាចគង់ចំរើនវិបស្សនាកម្មដ្ឋាន និងស្វាធ្យាយធម៌ដែលព្រះពុទ្ធអង្គទ្រង់បានបង្រៀនរួចហើយ ។ បន្ទាប់ពីនោះមក ព្រះពុទ្ធបរមគ្រូទ្រង់យាងត្រឡប់ទៅកាន់ព្រះគន្ធកុដិរបស់ព្រះអង្គវិញ ។

(នៅមានតលេខក្រោយ)

- Original Illuatration and Naration in Thai by Gunapayuta.
- Translation into English by A Lu.
- Coloring by Yann Fang Lee
- Translation into Khmer by Bhikkhu Kong Am.



186- The Buddha usually got up before dawn, took a bath, and then went into Samadhi toexamine people's natures and characters. When he foundthat someone was suitable and ready to accept his teaching, he would go to that person's place and convert him tha veryday. After daybreak, the Buddha put on his robe, took his bowl, and went for alms from people in the neighbordhood. He sometime went alone and sometime with bhikkhus in neat files, everyone with bowl in hand; and in a peaceful and gracious manner they passed by one house after another, accepting food from all patrons.



187- Sometime there were people who respectfully invited the buddha to their homes to accept offerings. The Buddha usually accepted the invitation only if there was a proper reason. At the patron's home, the Buddha would sit on a prepared mat, and the patron would take the Buddha's bowl and fill it with the best food and offer it to him. After eating food and washing his hands, theBuddha expounded dharma to the people who were there, causing them to understand that after doing good or bad thing, they would correspondingly gain either happiness or misery, in either this or in a future life. He also advised and instructed them to practice diligently the Buddha-dharma. There after the Buddha returned to the monastery.



188-In the monastery, the Buddha used to sit quietly in the rest hall or under a tree in the surroundings waiting until all the bhiksus had returned from their alms round and had finished eating and then went for a while into his room to rest. When all the bhikkhus had assembled in the discussion hall, the Buddha would give a sermon that befitted the particular occasion. Or he would encourage the bhiksus during their discussion to learn and practice diligently the Buddha-dharma so that they might achieve the final goal of attaining nirvana in this present life.



189-When the Buddha had finished expounding the dharma, some bhikkhus often requested that the Buddha outline the main objectives of dharma so that they could understand and recite it in a way that befitted their particular natures and capacities. The Buddha would then consider the nature and the degree of advancement of the individual and give an easy intelligible or a very deep verse that was most suitable for that particular person. There after the bhiksus dispersed, each bhiksu would find a quiet place in the forest or under a tree or in a deserted dwelling, where he would sit down to meditate and recite the verse that the Buddha had given to him. The Buddha would also return to his own living quarters.

(Continued to after Issue)




# រោគប្រតិកម្មអាកាសធាតុ

រោគប្រតិកម្មអាកាសធាតុ កើតចេញពីរាងកាយបាន បង្កឱ្យអាការខាងប្រព័ន្ធដកដង្ហើមមានភាពលំបាក ។

**●សញ្ញាដែលលេចច្បាស់**

-តឹងច្រមុះ, រមាស់ភ្នែកហៀរ ទឹកសំបោរ

-កណ្តាស់ញឹក ណែនក្នុងច្រមុះ

-មានអារម្មណ៍តឹងច្រមុះនៅពេលព្រឹក ជួនកាលទៀត មានអារម្មណ៍ឈឺ.កនៅពេលព្រឹក

**●សារជាតិបង្ករោគប្រតិកម្ម ដែលជួបជាញឹកញាប់**

ធូលី កំទេចខ្មោចសត្វកន្លាត លំអងពីកេសរផ្កា កំទេចធូលី ដែលមាននៅក្នុងទីដំណេក និងរោមសត្វ ។

មេរោគដែលមាននៅក្នុងខ្យល់គេជឿថា ជារោគដែលពាក់ព័ន្ធជាមួយនឹងប្រព័ន្ធពូជ ដោយបានរកឃើញថា ប្រសិនបើឪពុកម្តាយកើតរោគនេះ កូនចៅមានឱកាសកើតបានដូចគ្នារហូតដល់ទៅ៧៥ភាគរយឯណោះ ។ វត្ថុដែលជួយឱ្យកើតរោគនេះបានខ្លាំងជាងគេ គឺការប៉ះពាល់បម្រែបម្រួលនៃអាកាសធាតុសុខភាពចុះខ្សោយអារម្មណ៍ធុញថប់តប់ប្រមល់ ។

**●អាការដែលប្រទះឃើញរួមជាមួយ**

អាចប្រទះឃើញអាការដកដង្ហើមដង្ហក់ កើតខ្យល់ប្រតិកម្មចំណីអាហារ រមាស់ភ្នែក និងឈឺភ្នែក ។ អ្នកខ្លះមានអាការធូន់ធូរ និងមានអាការចម្រុះមកព្រមគ្នារហូតមានទាំងគ្រុនក្តៅផងដែរ ។

**●វិធីព្យាបាល**



ការមើលថែទាំខ្លួនឯងគួរឈប់សម្រាកតេងឱ្យបានគ្រប់គ្រាន់ហាត់ប្រាណឱ្យបានរាល់ថ្ងៃ និងទទួលទានអាហារឱ្យត្រឹមត្រូវទៅតាមក្បួនខ្នាតអនាម័យ ។ ក្រៅពីនោះចៀសវាងរឿងដែលធុញថប់តប់ប្រមល់ និងប្រើឱសថតាមវេជ្ជបញ្ជាមិនគួរប្រើឱសថដោយខ្លួនឯង ។

**●ការមើលថែទាំវត្ថុជុំវិញ**

បោសសំអាតធូលី និងសត្វល្អិតនៅក្នុងបន្ទប់ដេក សំអាតបន្ទប់ដេករាល់ថ្ងៃ រៀបចំបន្ទប់ដេកឱ្យស្រឡះ និងធ្វើយ៉ាងណាឱ្យមានប្រដាប់ប្រដាតុបតែងតិចបំផុត ។ ចៀសវាងវត្ថុ ដែលធ្វើពីរោមសត្វសំឡីគចៀសវាងការប្រើព្រំពូក និងកម្រាលខ្នើយ ត្រូវយកហាលកំដៅថ្ងៃរាល់សប្តាហ៍ ក្រៅពីនោះគ្រឿងដំណេកទាំងអស់គួរសំអាតយ៉ាងហោចណាស់ក្នុង១ខែ២ដង ។

**●រក្សាទុកសៀវភៅ និងសំលៀកបំពាក់នៅក្នុងទូ ដែលបិទជិត**

ប្រើវត្ថុដែលផលិតចេញពីសរសៃសំយោគ ឬអេប៉ុង ព្រមទាំងកំចាត់ទីជម្រករបស់សត្វកន្លាត សត្វល្អិតក្នុងទីងងឹតទៃៗនៅក្នុងផ្ទះផងដែរ ។ គួរកាត់បន្ថយលំអងកេសរផ្កាស្មៅ ចៀសវាងនាំចូលនូវផ្កាស្រស់ ឬក៏ដើមឈើចូលទៅក្នុងផ្ទះ ។ ក្រៅពីនោះមិនគួរសិ្ទធស្នាលជាមួយសត្វពាហនៈដែលចិញ្ចឹមទុកនៅក្នុងផ្ទះ ជាពិសេសបំបាត់ភាពសើមជោកជាំ ដូចជានៅក្នុងបន្ទប់ទឹកតាមជើងផ្កា និងក្នុងផ្ទះបាយដើម្បីកំចាត់ពពួកមេរោគផ្សិត ៕

# គុណប្រយោជន៍នៃផ្លែម្រះ

▸ **ផ្នែកដែលប្រើធ្វើជាឱសថ :** សាច់ផ្លែម្រះខ្ចីដែលបេះពេលវាមានពណ៌បៃតងនៅឡើយ ។

▸ **រសជាតិ និងគុណសម្បត្តិ :** សាច់ផ្លែម្រះមានរសជាតិល្វីងមានគុណសម្បត្តិជួយចម្រើនអាហារ (ធ្វើឱ្យយើងបរិភោគអាហារបានច្រើន) ប៉ូវទឹកប្រមាត់, ព្យាបាលជម្ងឺលំពែងថ្លើម និងទម្លាក់ព្រូន ។ ទឹកពូតចេញពីផ្លែម្រះអាចប្រើជាថ្នាំបញ្ចុះកម្រិតស្រាល ហើយអាចបៀមព្យាបាលដំបៅមាត់ និងជ្រាំងមាត់អណ្តាត ។

▸ **ទិន្នន័យផ្នែកវិទ្យាសាស្រ្ត :** នៅក្នុងផ្លែម្រះខ្ចីមានវីតាមីនC ក្នុងកម្រិតខ្ពស់ និងមានជាតិល្វីង ។ តាមរយៈការពិសោធន៍ឃើញថា ទឹកដែលច្របាច់យកពីម្រះខ្ចីអាចធ្វើឱ្យជាតិស្ករក្នុងឈាមថយចុះ ។

▸ **វិធីប្រើ :** ផ្លែម្រះខ្ចីអាចទទួលទានធ្វើជាថ្នាំចម្រើនអាហារដោយស្ងោរវាឱ្យឆ្អិនទទួលទានជាមួយទឹកគ្រឿង ។ ចំណែកផ្លែម្រះទុំវិញហាមទទួលទាន ព្រោះវាអាចបណ្តាលឱ្យរមួលក្ពួតចង្អោរ ។ ក្រៅពីផ្លែស្លឹកម្រះក៏ត្រូវគេនិយមទទួលទានផងដែរ ដូចជាយកទៅស្លកកូរ ឬឆាផាត់ខ្លាញ់ធ្វើជាអន្លក់ក៏បាន ។ ប៉ុន្តែដោយសារវាមានជាតិល្វីងមុននឹងយកវាទៅធ្វើអាហារគួរយកទៅត្រាំក្នុងទូរទឹកកក ប្រមាណ២-៣ម៉ោង ដើម្បីកាត់បន្ថយជាតិល្វីងសិន ៕





# ជោគជតារាសីទាំង 12 ប្រចាំឆ្នាំថោះ

ជោគជតាប្រចាំសប្តាហ៍



**ឆ្នាំជូត**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូររៀបចំគម្រោងផែនការជាមុនទើបពុំមានការថ្លោះធ្លោយ ។ ក្រៅពីនោះ បើមានរឿងឈ្លោះវិវាទកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឲ្យបានត្រជាក់ ទើបរឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



**ឆ្នាំឆ្លូវ**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចប្រកបកិច្ចការ-ងារបានពេញដៃពេញជើងតែនៅពេលជាប់មមាញឹកខ្លាំង ចូរប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់នាំឲ្យខាតបង់លាភសក្ការៈ ។ ចំពោះគូស្នេហ៍ក្នុងពេលនេះប្រកបតែសេចក្តីសុខ ៕



**ឆ្នាំខាល**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ លោកអ្នកអាចរកផលចំណូលបានច្រើនគ្រាស់ក្រៃលគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំនោះដែរ គឺបានត្រឹមតែចំណាយកម្លាំង និងពេលវេលាឥតអំពើតែប៉ុណ្ណោះ ។ ចំពោះ គូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕



**ឆ្នាំថោះ**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ។ ដូច្នេះបើលោកអ្នកមានទិញលក់ដីធ្លីផ្ទះ ឬវត្ថុមានតម្លៃផ្សេងៗ ចូរ ធ្វើលិខិតស្នាមដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឲ្យបានត្រឹមត្រូវ ទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្តី សុខក្សេមក្សាន្ត ៕



**ឆ្នាំរោង**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះលោកអ្នកជាមនុស្សពូកែខាងសម្តីវោហារ ហើយបើបានធ្វើជាមេគេ និងទោះជាបាននិយាយស្តីច្រើនបន្តិចក្តីក៏មិនឥតប្រយោជន៍ដែរ ព្រោះត្រូវបានកូនចៅនៅក្រោមស្តាប់បង្គាប់បញ្ហាឥតហ៊ានងាករេទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយ ភាពផ្អែមល្ហែមដូចទឹកឃ្មុំ ៕



**ឆ្នាំម្សាញ់**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែលោកអ្នករត់ចុះរត់ឡើង មានការមមាញឹក និងហត់នឿយច្រើនក្តី តែភោគផលកម្រៃហូរចូលបានតិចតួចស្តួចស្តើងប៉ុណ្ណោះ ។ ដូច្នេះចូរកុំរកបានមកដោយតឹងតែចាយធូរឲ្យសោះ ។ ចំពោះស្នេហាក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលជ្រៀតជ្រែក ៕



**ឆ្នាំមមី**

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឲ្យសោះជាពិសេសបើមានមនុស្សចម្លែកយករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ឲ្យដោយធូរថ្លៃក៏មិនត្រូវទទួល ឬទិញយក ដែរប្រយ័ត្នជាន់ដានចោរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវចុះសម្រុង គ្នាប៉ុន្មានទេ ៕



**ឆ្នាំមមែ**

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះថ្វីត្បិតតែការងាររកស៊ី អាចរើប។បន្តិចឡើងវិញក្តី តែអ្វីដែលលោកអ្នកគួរប្រយ័ត្នប្រយែងនោះ គឺនឹងមានមនុស្សសម្តីផ្អែមត្រជាក់មកលួងលោមបំពងបោកប្រាស់តាមគ្រប់រូបភាព ដូច្នេះទាំងបុរសស្ត្រី គឺមិនត្រូវចាប់ត្រចៀកទន់ជឿទុកចិត្តគេពេកទេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ប្រកបតែសេចក្តីសុខនឹងគ្នា ៕



**ឆ្នាំវក**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឲ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីលក់ដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើចូរចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឲ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្វាមីភរិយា ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕



**ឆ្នាំរកា**

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ គឺអាចទទួលបានផលសម្រេចត្រឹមតែពាក់កណ្តាលប៉ុណ្ណោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំឡើយ ព្រោះកាលបើមានការថ្លោះធ្លោយអាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចសព្វមួយដង ៕



**ឆ្នាំច**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចទទួលបានផលសម្រេចសមតាមការបំណងប្រាថ្នាទាំងអស់ ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬចេញទៅជួញដូរផ្លូវឆ្ងាយ គឺសមប្រកបទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រកបដោយសេចក្តីសុខក្សេមក្សាន្ត ៕



**ឆ្នាំកុរ**

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែការងាររកស៊ីរបស់លោកអ្នកបានជួបនឹងគូប្រជែងជើងខ្លាំងយ៉ាងណាក្តីក៏មិនភ័យព្រួយអ្វីដែរ ព្រោះលោកអ្នកមានប្រៀបឈ្នះជាប់ជានិច្ច ។ ចំពោះកម្លោះក្រមុំក្នុងរយៈពេល នេះអាចទាក់ទងគ្នានឹងបានក្លាយជាគូស្នេហ៍ដ៏ប្រពៃមួយគូ ៕

# ប្រវត្តិរណសិរ្សជាតិរំដោះប្រជាពលរដ្ឋខ្មែរ រ.ជ.រ.ប.ខ លោកតា សឺន សាន



**ដោយ : ម៉ម យ៉ឺន**

កូនចៅព្រះអង្គបានទេ ពីព្រោះសព្វថ្ងៃគេបានដកអំណាចព្រះអង្គអស់រលីងហើយ ហើយព្រះអង្គដឹងច្បាស់ថា នៅរយៈពេល១សតវត្សទៀត (១០០ ឆ្នាំ) ប្រទេសខ្មែរនឹងក្លាយទៅប្រទេសយួនជាពិតប្រាកដណាស់"។

-តើជនជាតិខ្មែរនាសម័យនេះ ត្រូវតែព្រមទទួលជឿដល់ព្រះអតីតមហាក្សត្រខ្មែរនេះបានឬទេ? បើព្រះអង្គធ្លាប់ធ្វើជាស្តេចផែនដីខ្មែរ តាំងពីសម័យអាណានិគមនិយមបារាំងមកម្ល៉េះដូច្នេះ?

**ភាគ៥_ដំណោះស្រាយរបស់ អ.ស.ប ដើម្បីបញ្ចប់សង្គ្រាម**

តទៅនេះ សូមបន្តហេតុការណ៍ដែលកើតមានក្រោយថ្ងៃទី៧ មករា ១៩៧៩ ជាបន្តទៅទៀត។

ទោះបីជាកងទ័ពយួនក្រហម ក្រោយពីបានកាន់កាប់ត្រួតត្រា និងរៀបចំកិច្ចការ ទាំងផ្នែករដ្ឋបាល និងផ្នែកប្រជាពលរដ្ឋរួចចប់សព្វគ្រប់ហើយក៏ដោយ ក៏កងទ័ពយួនក្រហមបានសន្យាថា នឹងដកចេញឱ្យអស់រលីងពីប្រទេសខ្មែរ ក្រោមការត្រួតពិនិត្យរបស់អង្គការសហប្រជាជាតិ និងអង្គការអន្តរជាតិនានា ដែលបានចូលមកប្រទេសខ្មែរ ស្របពេលជាមួយគ្នានោះ កិច្ចចរចាររវាងរណសិរ្សអ្នកតស៊ូមិនមែនកុម្មុយនីស្ត ភាគីខ្មែរក្រហមនិយមចិន និងភាគីខ្មែរកុម្មុយនីស្តនិយមយួន ក៏បានធ្វើជាបន្តបន្ទាប់មកដែរ។

ហើយទោះបីជាការចរចារគ្នា ពុំទាន់បានចុះសម្រុងសព្វគ្រប់ក៏ដោយ ក៏គេសង្កេតឃើញបញ្ហាមួយចំនួនបានសម្រេចហើយដែរ ហើយនឹងអាចបញ្ចប់ទៅនៅពេលខាងមុខឆាប់ៗ ពីព្រោះភាគីខ្មែរកុម្មុយនីស្តនិយមយួន ហើយនឹងកងទ័ពយួនក្រហម បានរៀបចំគម្រោងផែនការរបស់ខ្លួន នៅក្នុងប្រទេសខ្មែរបានចប់សព្វគ្រប់អស់ហើយៗ អ្វីៗក៏ត្រូវតែបញ្ចប់ជាមួយគ្នាដែរ។

កិច្ចចរចារនេះ ដោយមានការជួយជ្រោមជ្រែងពីអន្តរជាតិផង ជាពិសេស គឺអង្គការសហប្រជាជាតិ និងប្រទេសនានា មួយចំនួនបានចូលរួមផង ទើបបណ្តាលឱ្យកិច្ចចរចារគ្នានោះ មានសភាពច្បាស់លាស់ និងរៀបរយ ទោះបីជាមានការជំទាស់ប្រឆាំងខ្លះៗពីភាគីខ្មែរកុម្មុយនីស្តនិយមយួន យ៉ាងណាក៏ដោយ។

គោលបំណងនៃសន្និសីទអន្តរជាតិនេះ គឺចង់បានឱ្យសង្គ្រាមនៅក្នុងប្រទេសខ្មែរបានបញ្ចប់ទៅ ហើយនឹងរៀបចំការគ្រប់គ្រង ដឹកនាំឱ្យបានស្ថិតនៅក្នុងសភាវជាប្រទេសឯករាជ្យ ដោយមានរដ្ឋាភិបាលមួយមានលក្ខណៈជារដ្ឋាភិបាលឯករាជ្យ ប្រកាន់យកគោលជំហរ និងសតិស្មារតីជាម្ចាស់ប្រទេសពេញបរិបូរ ពុំត្រូវឱ្យប្រទេសខ្មែរ ទៅស្ថិតនៅក្រោមការត្រួតត្រា ឬគាបសង្កត់ពីប្រទេសណាមួយជាដាច់ខាត មានន័យថាត្រូវឱ្យប្រទេសខ្មែរប្រកាន់យកនយោបាយក្រៅប្រទេសជាប្រទេសអព្យាក្រិត្យពិតប្រាកដ ដូចគ្នាកាលសម័យក្រោយឯករាជឆ្នាំ១៩៥៣ ដែលសន្និសិទអន្តរជាតិក្រុងហ្សឺណែវមានកំណត់ឱ្យរួចម្តងទៅហើយដែរ ។

ជាពិសេសគឺចង់ឱ្យប្រទេសខ្មែរមានមេដឹកនាំប្រទេសជាតិជាមេដឹកនាំប្រកបដោយសុទិដ្ឋិនិយម មានសតិស្មារតី និងមនសិការស្នេហាជាតិពិតប្រាកដ មានមតិសច្ចៈយុត្តិធម៌ ចរិយធម៌ គុណធម៌ សុច្ចរិត ទៀងត្រង់ និងអង់អាចក្លាហាន ដោយគោរពនូវនីតិរដ្ឋគ្រប់ប្រការ និងគោរពលទ្ធិប្រជាធិបតេយ្យ ដែលជារបបគ្រប់គ្រងប្រទេសដ៏ល្អវិសេសនាសម័យនេះ ។ ពីព្រោះប្រជាពលរដ្ឋលោកកំពុងតវ៉ា ប្រឆាំងយ៉ាងខ្លាំងក្លាបំផុតទៅលើរបបគ្រប់គ្រងផ្តាច់ការ សង្កត់សង្កិនប្រព្រឹត្តអំពើទុច្ចរិតពុករលួយ កេងប្រវ័ញ្ចនិងបោកបញ្ឆោតប្រជាពលរដ្ឋ ដែលជារបបគ្រប់គ្រងមួយដឹកនាំប្រទេស និងប្រជាជាតិឱ្យធ្លាក់ទៅក្នុងមហន្តរាយជាពិតប្រាកដ ។

តើគោលបំណងនៃអង្គការអន្តរជាតិបានសម្រេចដល់កំរិតណាដែរ នៅក្នុងការជួយរៀបចំប្រទេសកម្ពុជានេះ ?

ដោយសារចង់បានសន្តិភាព ដល់ប្រជាពលរដ្ឋខ្មែរ អង្គការសហប្រជាជាតិបានសន្យា :

**ទី១**-ផ្តល់ថវិកាចំនួន២ពាន់លានដុល្លារ (ពីរកោដ) សម្រាប់យកមករៀបចំការបោះឆ្នោតសកលជ្រើសរើសមេដឹកនាំថ្មី ។



**ទី២**-ជួយស្តាបនាប្រទេសខ្មែរឡើងវិញ ដែលបានខូចខាតខ្ទេចខ្ទីដោយសង្គ្រាមជាច្រើនឆ្នាំឱ្យបានល្អត្រឹមត្រូវឡើងវិញគ្រប់វិស័យ ទៅតាមគម្រោងការនានាដែលមាននៅក្នុងអង្គការសហប្រជាជាតិសម្រាប់ជួយដល់ប្រទេសទន់ខ្សោយដូចជា ផ្នែកសិក្សាធិការអប់រំ ផ្នែកសេដ្ឋកិច្ច ផ្នែកការពារបូរណភាព និងអធិបតេយ្យភាពទឹកដី ផ្នែកប្រើប្រាស់សិទ្ធិសេរីភាព និងផ្នែកអនុវត្តលទ្ធិប្រជាធិបតេយ្យឱ្យបានគ្រប់គ្រងល្អមឱ្យប្រទេស និងជនជាតិខ្មែរមានការរីកចំរើនលូតលាស់ និងប្រកបដោយសុខសន្តិភាពក្នុងយុត្តិធម៌សង្គម ដូចជាអារិយប្រទេសនានានោះដែរ ។

**(មានតនៅលេខក្រោយ)**

# ឱសថស្ថាន TRX PHARMACY

**5520 Whitaker Avenue Unit C (Next To BEN CITY)**
**PHILADELPHIA, PA 19124 TELEPHONE: 215-288-8701**



## ម្ចាស់ហាង: ស៊ីវ អេង

- យើងទទួលយកអ៊ិនស្វិរិនស្ទើរតែទាំងអស់
- អាចយកថ្នាំទៅជូនដល់ផ្ទះ
- មានគម្រោងបង់ថ្លៃពិសេស សម្រាប់ "ខូប៉េយ" ដែលមានតម្លៃខ្ពស់
- ពិសេស: មានជូនកំរៃ៤៥សម្រាប់អ្នកមកទិញថ្មីដែលមានការផ្ទេរវេជ្ជបញ្ជា
- កន្លែងចតឡានធំទូលាយ
- សេវាត្រឹមត្រូវច្បាស់លាស់ មានវិជ្ជាជីវៈធ្វើការលឿន
- មានរង្វាន់ បើយកវេជ្ជបញ្ជាមកទិញថ្នាំ

**ពិសេស** : ជូនម្សៅអ៊ិនស្លូមួយកំប៉ុងពេលទិញតាមវេជ្ជបញ្ជា១០មុខ មានសំរាប់ភ្ញៀវដែលគ្មាន អ៊ិនស្វិរិន មានថ្នាំជេណេរិកច្រើនរយមុខតម្លៃ $14.99 សំរាប់៩០ថ្ងៃ ថ្នាំអងគាយពាយូទិក ដូចជា Amoxicillin, Ampicillin, Cephalesin តម្លៃ $4



**រាល់ខែមានចាប់ឆ្នោតសម្រាប់អ្នកយកថ្នាំនៅទីនេះ អាចត្រូវឆ្នោតវត្ថុ ដូចជា Telephone**
**Samsung Galaxy ឬ Ipod Touch**



### គាំទ្រគ្រូពេទ្យប្រចាំគ្រួសារមាន :

TRUONG NGUYEN, MD
5746 Rising Sun Avenue
Philadelphia, PA 19120
**215-904-6891**

KENNETH NGUYEN, MD
448 E WYOMING AVE
Philadelphia, PA 19120
**215-324-2180**

NICHOLAS TRUONG, MD
133 EAST LEHIGH AVE
Philadelphia, PA 19125
**215-426-9344**

---

CAMBODIAN ASSOCIATION OF GREATER PHILADELPHIA, INC.

## Walk-in Services Now Available Both Centers!

ឥឡូវនេះអ្នកនឹងទទួលបានការជួយពី ការិយាល័យទាំងពីររបស់សមាគមខ្មែរ ដោយមិនចាំបាច់ធ្វើការណាត់ជួប !



**North Office**
**ការិយាល័យខាងជើង**
5412 N. 5th Street
Philadelphia, PA 19120
Tuesdays & Thursdays
9:30AM to 4:30PM

**South Center**
**ការិយាល័យខាងត្បូង**
2416-18 S. 7th Street
Philadelphia, PA 19148
Wednesdays
9:30AM to 4:30PM

*For services, come to one of our offices listed above. To make an appointment, please call:
Cindy Suy at (215) 971-5785 or
Putery Long at (267) 475-9363.
បើអ្នកត្រូវការជំនួយ សូមអញ្ជើញមកការិយាល័យណាមួយក្នុងចំណោមការិយាល័យខាងលើ ឯកទាក់ទងទៅ :
- Cindy Suy at (215) 971-5785 or Putery Long at (267) 475-9363.

ដើម្បីធ្វើការណាត់ជួប

## Need Assistance? បើអ្នកត្រូវការជំនួយ?

We can assist with: យើងអាចជួយអ្នកដូចជា:
Applications for public benefits:
ជួយបំពេញសំនុំរឿងដើម្បីស្នើរសុំការជួយពីរដ្ឋ :
- Food Stamps លុយម្ហូប
- Medical Assistance សំបុត្រពេទ្យ
- Cash Assistance លុយជំនួយលុយពីរដ្ឋ
- SSI, etc. លុយសំរាប់អ្នកពិការ

LIHEAP ជំនួយបង់ថ្លៃហ្គាស រឺ ភ្លើង
CHIP សំបុត្រពេទ្យសំរាប់កុមារ
Rent rebate សុំលុយបន្ថែមសំរាប់អ្នកពិការដែលបង់ថ្លៃផ្ទះរឺជួលផ្ទះ
Interpretation/Translation សេវាបកប្រែ
...and more! និងការជួយផ្សេងៗទៀត...



